ខ្មែរប៉ុស្តិ៍
THE KHMER POST
ISSUE 40 July 24th-August 06th 2009



# លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ចូលរួម បុណ្យជាតិ ១៤ កក្កដា នៅប្រទេសបារាំង

ហ្វីឡាដែលហ្វៀ, ខ្មែរប៉ុស្តិ៍, ដោយ : ពិន សំខុន

●●●លោក ហ៊ុន សែន នាយករដ្ឋមន្ត្រីខ្មែរ បានទៅធ្វើទស្សនកិច្ច ២ថ្ងៃ នៅទីក្រុងប៉ារីស នៃប្រទេសបារាំង គឺថ្ងៃទី ១៣-១៤ កក្កដា ឆ្នាំ ២០០៩ ចំថ្ងៃដែលប្រទេសបារាំង ប្រារព្ធបុណ្យជាតិដ៏ធំបង្អស់របស់គេ ។



ដំណឹងនេះបានបណ្តាលឱ្យសហគមន៍ខ្មែរ នៅក្រៅប្រទេសមានការភ្ញាក់ផ្អើល ដោយឃើញឥរិយាបថចម្លែករបស់រដ្ឋាភិបាលបារាំង តទៅទំព័រទី ១៨

# បុណ្យចូលវស្សាព្រះសង្ឃត្រូវគង់ក្នុងវត្តធ្វើធម៌

ភ្នំពេញ, ខ្មែរប៉ុស្តិ៍ : គឹម សារឿន

●●●លទ្ធិព្រះពុទ្ធសាសនាបានចាក់ឫសយ៉ាងជ្រៅក្នុងក្រអៅបេះដូងខ្មែរគ្រប់រូបតាំងពីសម័យបុរាណរហូតមកដល់បច្ចុប្បន្ន ។ ជាពិសេសជំនឿចំពោះបុណ្យ បាប ធ្វើល្អបានល្អ ធ្វើអាក្រក់បានអាក្រក់ ប្រៀបដូចស្រមោលអន្ទោលតាមប្រាណ គឺមានជាតិមុខជាតិក្រោយ និងបច្ចុប្បន្នជាតិ ។



ពុទ្ធសាសនិកខ្មែរនិយមធ្វើបុណ្យទាន ដើម្បីជម្រះបាបកម្មបានលះបង់នូវទ្រព្យសម្បត្តិផ្ទាល់ខ្លួនក្នុងការកសាងកុសល គោរពចំពោះព្រះពុទ្ធ ព្រះធម៌ និងព្រះសង្ឃហើយប្រាថ្នាជាតិក្រោយ បានទៅកើតនៅឋានសួគ៌ ឬនិព្វានដែលជាទីបរមសុខ ហើយនិយមធ្វើបុណ្យតាំងពីបុរាណមានបុណ្យចូលឆ្នាំ កឋិន ភ្ជុំបិណ្ឌ ពិសាខបូជា... ។ ចំណែកបុណ្យចូលវស្សាគេប្រារព្ធធ្វើជារៀងរាល់ឆ្នាំ ចាប់តាំងពីថ្ងៃ1រោជ ខែអាសាឍ រហូតអស់ត្រីមាស ទើបចេញវស្សានៅថ្ងៃ15កើត ខែអស្សុជ ។

ក្នុងពិធីនោះពុទ្ធបរិស័ទជិតឆ្ងាយបាននាំយកនូវទេយ្យទានទៅប្រគេនដល់ព្រះសង្ឃនៅតាមទីវត្តអារាមនានា ។ ជាពិសេសប្រេង និងទៀនសម្រាប់ដុតបំភ្លឺ ដោយមានគេជំនឿថា វត្ថុទាំងនេះនឹងទទួលបាននូវកុសលសម្រាប់ជាតិក្រោយ មានប្រាជ្ញាឈ្លាសវៃរៀនសូត្រឆាប់ចេះចាំ និងជាកំណប់ទ្រព្យក្នុងវិស័យ តទៅទំព័រទី ១៩

# តំណាងរាស្ត្រអស់អភ័យឯកសិទ្ធិពិបាកស្វែងរកមេធាវី

ភ្នំពេញ, ខ្មែរប៉ុស្តិ៍ : ស៊ុម សុភាឫទ្ធិ

●●●បន្ទាប់ពីមេធាវីរបស់ ហ៊ុន សែន ប្តឹងទៅតុលាការក្រុងឱ្យបញ្ចប់អាជីពរបស់ លោក គង់ សំអុន មេធាវី របស់លោកស្រី មូរ សុខហួរ និងលោក ហូរ វ៉ាន់ រួចមក លោក គង់ សំអុន ដែលធ្លាប់តែប្រឆាំងខ្លាំងក្លានោះ បានសម្រេចចិត្តសរសេរលិខិតសុំទោសនាយករដ្ឋមន្ត្រី ហ៊ុន សែន និងប្តូរជំហរលែងធ្វើជាមេធាវីឱ្យកូនក្តីរបស់ខ្លួនយ៉ាងតក់ក្រហល់បំផុត ។



ការផ្លាស់ប្តូរឥរិយាបថ180ដឺក្រេ របស់មេធាវី គង់ សំអុន បានធ្វើឱ្យតំណាងរាស្ត្រពីររូប ដែលត្រូវបានគេដកអភ័យឯកសិទ្ធិនោះ ហាក់ដូចជា ចង់អស់ចំណេះក្នុងការស្វះស្វែងរកមេធាវីឱ្យជួយការពារក្តីឱ្យខ្លួន ពីព្រោះមេធាវី តទៅទំព័រទី ១៥

# តើមានអ្វីប្លែកនៅហ្វីឡាដែលហ្វៀ




**ហ្វីឡាដែលហ្វីយ៉ា, ខ្មែរប៉ុស្តិ៍,ដោយ : ពិន សំខុន**

•••សមាគមខ្មែរ ផ្លូវលេខ ៥ ខាងជើង ហ្វីឡាដែលហ្វៀ បានចេញសេចក្តីអញ្ជើញឱ្យសមាជិករបស់ខ្លួន មកបោះឆ្នោតក្នុងមហាសន្និបាតប្រចាំឆ្នាំរបស់ខ្លួន ដើម្បីជ្រើសរើសគណកម្មាការនាយក និងប្រធានសមាគមប្រចាំឆ្នាំថ្មី សម្រាប់ថ្ងៃទី ២៥ កក្កដា ២០០៩ វេលាម៉ោង ១០ ព្រឹក ។

មហាសន្និបាតនេះមានសារសំខាន់ពិសេសពីរយ៉ាង ដែលសមាជិកសមាគម និងសហគមន៍គួរចូលរួម :

**១-** សមាគមខ្មែរមានតួនាទីតំណាងឱ្យសហគមន៍របស់ខ្លួន ដូច្នេះ សមាជិកទាំងអស់នៃសហគមន៍ត្រូវរួមចំណែកបង្ហាញពីសេចក្តីត្រូវការរបស់ខ្លួន ចង្អុលទិសដៅឱ្យអ្នកគ្រប់គ្រងអាចរកសេវាមកបំរើជូនបាន ។

**២-** កិច្ចការមួយចំនួនធ្វើបានប្រសើរហើយថ្មីៗនេះ ក្រោមការដឹកនាំប្រធានក្រុមប្រឹក្សាសហគម ស៊ិត សម និងនាយកប្រតិបត្តិ រ៉ង ស៊ិន សហគមន៍ខ្មែរ បានបង្ហាញទស្សនៈបើកចំហរសម្ព័ន្ធភាពទៅក្រៅ និងក្នុងសហគមន៍កាន់តែធំទូលាយ ហើយប្រសើរឡើង ធ្វើឱ្យភ្នែកសាធារណជន និងរដ្ឋអំណាចមើលឃើញ និងជួយជ្រោមជ្រែងខ្មែរកាន់តែខ្លាំងឡើង ។ ដូច្នេះ ជាឱកាសល្អបំផុតសំរាប់សំដែងការយកចិត្តទុកដាក់គាំទ្រសមាគមខ្មែរឱ្យបានរឹងមាំ ដើម្បីទាញយកធនធានមកជួយសមាគមឱ្យរឹតតែប្រសើរ ។

ទូរស័ព្ទសមាគមខ្មែរ : **២១៥- ៣២៤ ៤០៧០**

## •••សហគមន៍ខ្មែរ

## S.West-Phila

នៅតំបន់ខាងត្បូងឈៀងខាងលិចក្រុងហ្វីឡាដែលហ្វៀ សហគមន៍ខ្មែរ ដែលពីដើមសម្បូរមនុស្សទៅរស់នៅទីនោះ ឥឡូវបានថយចេញទៅរស់នៅទីផ្សេងអស់ហើយ ដោយសារស្ថានភាពសេដ្ឋកិច្ចចុះដុនដាបជាច្រើនឆ្នាំមក ដោយសារអសន្តិសុខ ព្រោះមានឈ្មួញលក់គ្រឿងញៀនចេញចូលឆ្លងកាត់ ដោយសារអន្តរាគមន៍នៃក្រុមសមាគមខ្មែរទៅមិនដល់ ។ល។

ភាពក្រីក្រនឹងគ្មានអនាគតភ្លឺស្វាងបានកើនខ្ពស់នៅទីនោះ ។ ស្រាប់តែឆ្នាំចុងក្រោយនេះ គេនាំគ្នានិយាយពីតំបន់ក្រខ្សត់ South West នោះឡើងវិញខ្លះៗ ដោយសារវត្តបាលីល័យ ឧស្សាហ៍នាំគ្នាទៅធ្វើបុណ្យនៅទីលានធំទូលាយ ដែលជាសម្បត្តិវត្ត ដោយសារចាស់ទុំនៅតំបន់នោះ ដែលភាគច្រើនជាអតីតយុទ្ធជន បានចូលរួមក្នុងចលនាយុទ្ធជនស្ម័គ្រចិត្ត ដើម្បីស្វែងរកការគាំទ្រពីអង្គការយុទ្ធជនសហរដ្ឋអាមេរិក ហើយចុងក្រោយបង្អស់នេះ ក្រុមគ្រួសារខ្មែរ ប្រមាណ ១០ គ្រួសារបានចូលសិក្សា "វិជ្ជាសំរាប់ប្រើធនធានរដ្ឋរកឋាមពលមកជួយគ្រួសារ" កាលពីខែមិថុនា នេះ ។ វិជ្ជានេះបានណែនាំឱ្យប្រើចំណេះអប់រំកូនចៅចំណេះសំរាប់ទប់ស្កាត់សុរា និងគ្រឿងញៀនផ្សេងៗ ចំណេះខាងប្រើប្រព័ន្ធអប់រំពិសេសដល់ កូនចៅ កុមារ... ។ល។ ការសិក្សាយ៉ាងយកចិត្តទុកដាក់របស់សិក្ខាកាមនៅ South West បានពង្រីកកម្លាំងក្រុមគ្រួសារខ្មែរមួយចំនួនឱ្យមានចំណងទាក់ទងនឹងរដ្ឋអំណាចយ៉ាងរឹងមាំ ហើយនាំធនធានដែលជាសិទ្ធិរបស់ខ្លួនមកបំរើគ្រួសារបាន ៕





# ទំព័រទស្សនៈ: ខ្មែរក្នុងប្រព័ន្ធផ្សព្វផ្សាយ

**ហ្វីឡាដែលហ្វីយ៉ា, ខ្មែរប៉ុស្តិ៍, ដោយ : ពិន សំខុន**


លោក ពិន សំខុន

●●●មនុស្សត្រូវការព័ត៌មាន ពីព្រោះព័ត៌មានជាចំណីនៃការអភិវឌ្ឍន៍នៃការប្រកួតប្រជែងនៃកិច្ចការពារផលប្រយោជន៍ ហេតុនេះ ហើយបានជាសម្ភារៈបំរើព័ត៌មានវាចេះតែលឿនឡើង ប្រញាប់ឡើងជាលំដាប់ តែមនុស្សជាច្រើនតែឆ្ងល់ថា ហេតុអ្វីបានជាមករស់នៅសហរដ្ឋអាមេរិកហើយនៅតែក្រ នៅតែឯកោ នៅតែភិតភ័យ ។

មែនហើយសហរដ្ឋអាមេរិក ជាសំបុកនៃបច្ចេកវិទ្យាទាក់ទងប្រណិត តែផ្តល់ប្រយោជន៍ឱ្យមនុស្សដោយជ្រើសរើសមិនស្មើភាពគ្នាមែន នៅហ្វីឡាដែលហ្វីយ៉ា នៅ ឡូវែល ឬឡុងប៊ិច ខ្មែរជាច្រើនប្រើទូរស័ព្ទទំនើប ប្រើប្រព័ន្ធអ៊ាំងទ័រណេតលឿនដូចផ្លេកបន្ទោល ប្រើប្រព័ន្ធទូរទស្សន៍ថ្មីធុនសំប៉ែត មើលបានរាប់រយឆាណែល អ្នកទាំងនោះតែទទួលនូវការកោតសរសើរ លើកដំកើងពីការមាន និងការចេះប្រើសម្ភារៈទំនើបសម្រាប់អភិវឌ្ឍន៍ ប្រកួតប្រជែង និងការពារផលប្រ - យោជន៍នោះ ។

ក៏ប៉ុន្តែ គេនៅតែឃើញស្រទាប់មនុស្សខ្មែរនៅថ្នាក់ទាបប្រមាណ ៦០% ថ្នាក់មធ្យម ៣០% ហើយមានតែ១០%ប៉ុណ្ណោះ ដែលគេអាចសន្មតបានថា ជាបុគ្គល ឬគ្រួសារអភិវឌ្ឍន៍បាន ។ ឧទាហរណ៍សម្រាប់ហ្វីឡាដែលហ្វីយ៉ានេះ បង្ហាញយ៉ាងជាក់ច្បាស់ថា កូនខ្មែរ ឬគ្រួសារខ្មែរនិយម តែងមានប្រព័ន្ធបច្ចេកទេសទាក់ទងទំនើបគ្រប់ៗគ្នា តែអ្នកដែលរាប់ចូលក្នុងចំនួន ៦០%នោះ មានជីវភាពប្រចាំថ្ងៃមិនគ្រប់គ្រាន់ រស់នៅក្នុងផ្ទះគ្មានសេចក្តីសុខទាំងកាយទាំងចិត្ត គ្មានគម្រោងសម្រាប់អនាគតភ្លឺស្វាងពេលខ្លី ឬវែង ឬពេលស្លាប់ ។ សម្រាប់អ្នកដែលនៅក្នុងចំណោម៣០% ជាជំពូកអ្នកចូលចិត្តចេញមុខចេញមាត់ បន្ថែមដោយរថយន្តម៉ាកថ្មី ផ្ទះថ្មីរស់នៅតំបន់អាមេរិកាំងស្បែកស ធ្វើបុណ្យដាក់ទានស្ទើរគ្រប់ទីកន្លែង មានមួយចំនួនធ្វើឱ្យគេសម្គាល់ថា ដើម្បីចេះធ្វើឱ្យគេរាប់អានច្រើន ត្រូវចេះបរិភោគធំ និងផឹកគ្រឿងស្រវឹងច្រើន ឬចូលរួមលេងល្បែងស៊ីសងនៅទីសាធារណៈ។ សម្រាប់អ្នកចាត់ក្នុងចំណោម ១០% គឺគេរកមិនដែលឃើញតែម្តង លើកលែងតែមានពិធីជប់លៀងសំខាន់ៗ នៅមហាសន្និបាតធំ ។ អ្នកទាំងបីជំពូកនេះ ថ្វីត្បិតតែរស់នៅក្បែរគ្នាមែន ក៏ប៉ុន្តែមិនសូវដឹងពីជីវភាពពិតប្រាកដទៅវិញទៅមក ហើយជាទូទៅ គេខ្មាសអៀននឹងការសំដែងមតិពីស្ថានភាពខ្លួនជាសាធារណ ។

ភាពមិនស្មើ ហើយខុសដាច់ឆ្ងាយពីគ្នានេះ ខ្លះនៅតែយល់នៅឡើយថា កម្មពៀរវេរា ខ្លះថាព្រះដាក់ទោស ឬ អារក្សសាតាំង ហើយអ្នកនៅស្រទាប់៦០% និង ៣០%នោះហើយដែលចូលរួមធ្វើបុណ្យនៅទីវត្តអារាមនានា ឬទីថ្វាយបង្គំព្រះច្រើនជាងគេ ។ រីឯអ្នកស្រទាប់ ១០% គេទុកពេលវេលាសម្រាប់គ្រួសារ ហើយមិនចូលរួមនឹងអ្វីដែលគេពុំបានគ្រោងពីយូរហើយនោះទេ ។ ទស្សនៈខ្លះទៀតគេយល់ថា មកពីចំណេះ និងការអប់រំក្នុងគ្រួសារនោះហើយ ដែលនាំឱ្យខ្មែរមានសម្បត្តិ ឬទទួលការគោរពខុសគ្នា ហើយរូបភាពខុសគ្នានៃសំបកក្រៅនេះ បានធ្វើឱ្យសហគមន៍ខ្មែររស់ដាច់ពីគ្នា លាក់ខ្លួននៅពីក្រោយភាពអៀនខ្មាស ភាពច្រណែន ភាពរើសអើង ហើយប្រឹងរុញច្រានភាពដាច់គ្នាឱ្យរឹតតែឆ្ងាយ ដោយការមិនចង់ដឹងពីអ្នកដទៃ។ នៅមានទស្សនៈមួយចំនួនទៀត ដែលវប្បធមិចង្អៀតចង្អលរបស់ខ្មែរ ពុំបានប្រើប្រព័ន្ធទាក់ទងសម្រាប់ជាសាមគ្គីជាមួយនឹងជាតិសាសន៍ដទៃដែលរស់នៅជុំវិញខ្លួន ហើយបំបែកកម្លាំងគ្រួសារខ្លួនឯង សង្គមខ្លួនឯង ដូចជា ហៅចៅខ្លួនឯងថា " កូនអាខ្មៅ " ដូចជា " កូនប្រសាខ្ញុំអាតាំងស " ដូចជា អានេះយួន អានោះលាវ... ។ល។

សម្លឹងមើលភាពរុងរឿងជាទូទៅនៃសហ-គមន៍ខ្មែរ គេហាក់ដូចពុំឃើញថា ប្រព័ន្ធទាក់ទងគ្នានៃសហរដ្ឋអាមេរិក អាចយកជាផលប្រ-យោជន៍មកប្រើការបាន ក្នុងការប្រមូលផ្តុំមនុស្សឱ្យរស់នៅក្នុងសីលធមិដូចគ្នាបាននៅក្នុងកម្លាំងអភិវឌ្ឍន៍រួមបាន ក្នុងការជួយរំលែកទុក្ខអ្នកអន់ខ្សោយបាននៅឡើយទេ ។

ខ្មែរជាទូទៅ មិនជឿលើប្រព័ន្ធទាក់ទងមនុស្ស ជាមធ្យោបាយសម្រាប់អភិវឌ្ឍន៍មនុស្សទេ តែជំនឿនេះត្រូវបានតែពាក់កណ្តាលទេ ពីព្រោះប្រព័ន្ធទាក់ទងមនុស្សដែលយកធ្វើជាការបាន លុះណាតែការផ្សព្វផ្សាយ ហើយនឹងការប្រើប្រាស់ប្រព្រឹត្តទៅនៅក្នុងសីលធមិ គឺប្រព័ន្ធផ្សព្វផ្សាយពាក់កណ្តាលចុងក្រោយនេះ ហើយ ដោយរាប់ទាំងទូរស័ព្ទ អ៊ាំងទ័រណេត ទូរទស្សន៍ វិទ្យុ ទើបអាចរំលាយ រុស្ស៊ីកុម្មុយនីស្តរំលាយរដ្ឋផ្តាច់ការសំខាន់ៗ រំលាយការរំលោភជិះជាន់ប្រវិញមនុស្សបាន ហើយទីបំផុតបរិយាកាសនឹងត្រូវបង្កើតសម្រាប់អភិវឌ្ឍន៍មនុស្សបានថែមទៀត ដូចជាសហរដ្ឋអាមេរិក ដែលបានក្លាយបានជាមហាសម្បត្តិក្នុងលោកនេះជាដើម ។ សីលធមិដែលខ្មែរស្គាល់ច្បាស់ជាងគេ គឺសីល៥ ដែលមាន : ការពិត ( កុំភរ ) , កុំលួច , កុំសម្លាប់ , កុំល្មើសក្នុងកាមតណ្ហា , កុំស្រវឹង គឺសីលធមិដដែលនេះហើយ ដែលប្រព័ន្ធទាក់ទងមនុស្សបានខិតខិផ្សព្វផ្សាយ **តទៅទំព័រទី ១៦**



## មាតិការឿង

# ខួប១០ឆ្នាំរំលឹកវិញ្ញាណខន្ធពិសិដ្ឋ ពិលិកា

*ឆ័រវើ , ដោយ : ឡឹម ពិសិដ្ឋ*

•••ឃាតកម្មបាញ់សម្លាប់អ្នកស្រី ពិសិដ្ឋ ពិលិកា បានរំលងផុតអស់រយៈពេល១០ឆ្នាំគត់ គិតរហូត មកទល់ថ្ងៃទី ៦ ខែកក្កដា ឆ្នាំ ២០០៩ នេះ ។ ឃាតកនៅពុំទាន់ត្រូវបានសមត្ថកិច្ចកម្ពុជា ចាប់ខ្លួនមកផ្តន្ទាទោសតាមច្បាប់នៅឡើយទេ ។

តុលាការកម្ពុជា ត្រូវបានគេមើលឃើញថា មិនបានចាត់ការលើកសំណុំរឿងឃាតកម្មលើ រូបអ្នកស្រី ពិសិដ្ឋ ពិលិកា ទេ ។

លោក ហេង ពៅ អតីតប្រធានក្រុមការងារ ស៊ើបអង្កេតលើឃាតកម្ម អ្នកស្រី ពិសិដ្ឋ ពិលិកា និងជាអតីតស្នងការនគរបាលក្រុង នាពេលបន្ទាប់ មកត្រូវបានចាប់ខ្លួនកាលពីដើមឆ្នាំ២០០៧ ពីប្រទេសម៉ាឡេស៊ី ទីដែលលោកគ្រោងនឹងទៅកាន់ ប្រទេសហ្វាំងឡង់ ដែលបានផ្តល់សិទ្ធិជ្រកកោន ផ្នែកនយោបាយដល់រូបលោក ។ នៅពេលមុននោះ គឺកាលពីខែធ្នូ ឆ្នាំ ២០០៧ លោកត្រូវតុលាការ ក្រុងភ្នំពេញ កាត់ទោសកំបាំងមុខដាក់ពន្ធនាគារ រយៈពេល១៨ឆ្នាំ ពីបទពាក់ព័ន្ធនឹងអំពើមនុស្ស ឃាតលើអតីតចៅក្រម សុក សេដ្ឋាមុន្នី ។

អ្នកស្រី ពិសិដ្ឋ ពិលិកា ត្រូវបានជនប្រដាប់ អាវុធពីរនាក់ ស្លៀកពាក់ស៊ីវិលបាញ់សម្លាប់នា ថ្ងៃទី៦ ខែកក្កដា ឆ្នាំ១៩៩៩ នៅវេលាម៉ោង៩ ព្រឹក នៅខណៈពេលដែលអ្នកស្រីកំពុងដើរទិញ កងឱ្យក្មួយជាមួយនិងប្អូនស្រីរបស់អ្នកស្រី នៅ



មុំផ្សារអូរឫស្សី ។ អ្នកស្រី បានស្លាប់នៅមួយ សប្តាហ៍ក្រោយពីការបញ្ជូនទៅសង្គ្រោះនៅ មន្ទីរពេទ្យកាល់ម៉ែត្រ មិនបានសម្រេច ។

ឃាតកពីរត្រូវបានចង្អុលបង្ហាញដោយលោក ហេង ពៅ ឈ្មោះ ប៊ុនណា និង កូវ វិចិត្រ ជា អង្គរក្សផ្ទាល់របស់លោកនាយឧត្តមសេនីយ៍ អគ្គនាយកនគរបាលជាតិ ហុក ឡង់ឌី នៅក្នុង របាយការណ៍ចំនួន៩ទំព័ររបស់លោក មុនពេល លោកត្រូវបានគេចាប់ខ្លួន ។ លោក ហេង ពៅ បានសរសេរនៅក្នុងសេចក្តីថ្លែងការណ៍របស់ លោកថា នៅឆ្នាំ១៩៩៩ លោកបានធ្វើជាអនុ ប្រធានការិយាល័យប្រឆាំងឧក្រិដ្ឋកម្មនៃក្រសួង មហាផ្ទៃ និងបានទទួលខុសត្រូវដឹកនាំស៊ើបអង្កេត ករណីឃាតកម្មលើរូបតារាភាពយន្ត ពិសិដ្ឋ ពិលិកា ។ "ខ្ញុំបានរកឃើញថា មុនពេលនាងស្លាប់ នាងមានទំនាក់ទំនងជាមួយ ហុក ឡង់ឌី ។ ស្វាមី របស់នាងបានចាកចេញទៅក្រៅប្រទេសជា ញឹក ញាប់ ដោយទុកនាងឱ្យនៅក្នុងប្រទេស កម្ពុជា "។ នេះការថ្លែងបញ្ជាក់របស់លោក ហេង ពៅ ដោយលោកបានបន្តទៀតថា "លោក ហុក ឡង់ឌី បានមានទំនាក់ទំនងជាមួយនាងជារឿយៗ និងបានដឹកនាងដោយរថយន្តទៅកាន់ពិធីនានា និងបានទិញកាដូឱ្យនាងផង ។ល។ ក្នុងពេលមួយ រយៈចំណងស្នេហ៍បានកើតឡើងរវាងអ្នកទាំង ពីរ ហើយនាងបានពរពោះ កូនប្រុសមួយឱ្យ ហុក ឡង់ឌី , ហេង ពៅ បាន បន្ថែមយ៉ាងដូច្នេះ ។

បន្ទាប់មក ហុក ឡង់ឌី". បានណែនាំនាងឱ្យ បានស្គាល់លោក ហ៊ុន សែន ។ លោក ហ៊ុន សែន ក៏បានជួបនាង ។ ហេង ពៅ បានបញ្ជាក់ថា "មុនពេលស្គាល់លោក ហ៊ុន សែន នាងមិនបាន ប្រាក់កាសច្រើនទេ ប៉ុន្តែក្រោយមកនាងរក ប្រាក់បានយ៉ាងច្រើន ។ ក្នុងកុងគណនីរបស់



នាងនៅធនាគារកាណាឌីយ៉ា បានបង្ហាញសមតុល្យទឹកប្រាក់ចំនួន៣ម៉ឺនដុល្លារអាមេរិក នៅ មុនពេលនាងស្លាប់ " ។

ហេង ពៅ បានអះអាងបន្ថែមទៀតតាម ការស្រាវជ្រាវរបស់លោកថា "នាងត្រូវបានផ្តល់ នូវរថយន្ត ម៉ាក ហុងដា ស៊ីអាវី មួយគ្រឿង និង ផ្ទះវីឡាមួយខ្នង ។ នាងមានការព្រួយបារម្ភ ចំពោះសុវត្ថិភាពរបស់នាងជារៀងរាល់ថ្ងៃ ដោយ សារនាងបានដឹងថា ភរិយារបស់ លោក ហ៊ុន សែន បានដឹងអំពីទំនាក់ទំនងស្នេហាលួចលាក់ របស់នាងជាមួយលោក ហ៊ុន សែន ។ ភរិយារបស់ លោក ហ៊ុន សែន បានស្តីបន្ទោស លោក ហុក ឡង់ឌី ចំពោះការដើរតួជាមេអណ្តើករបស់លោកក្នុង រឿងស្នេហាលួចលាក់នេះ " ។ លោក ហេង ពៅ បានពន្យល់ទៀតថា " ហុក ឡង់ឌី " បានលួងលោម និងសន្យាចំពោះមុខភរិយា លោក ហ៊ុន សែន (អ្នកស្រី ប៊ុន រ៉ានី) ថានឹងបំបែកស្នេហាអ្នកទាំង ពីរ ។ មិនយូរប៉ុន្មានតារាភាពយន្តរូបនេះត្រូវបាន គេបាញ់សម្លាប់ " ។

ប្រធានក្រុមការងារស៊ើបអង្កេតនៃប៉ូលីស កម្ពុជាដដែល បានបង្ហាញពីការសង្កេតរបស់ លោក ទៅលើអ្នកប្រព្រឹត្តល្មើសក្នុងឃាតកម្ម លើរូបអ្នកស្រី ពិសិដ្ឋ ពិលិកា : "ខ្ញុំបានរកឃើញ ថា ឃាតកគឺជាមនុស្សម្នាក់ក្នុងចំពោះអង្គរក្ស របស់លោក ហុក ឡង់ឌី ។ ខ្ញុំបានសួរចម្លើយ ប៊ុនណា ហើយគាត់បានសារភាពថា គាត់មាន ការពាក់ព័ន្ធជាមួយឈ្មោះ កូវ វិចិត្រ ក្នុងការ បាញ់សម្លាប់នោះ ក្រោមការបញ្ជារបស់លោក ហុក ឡង់ឌី " ។

ហេង ពៅ បាននិយាយជាចុងក្រោយនៅក្នុង របាយការណ៍ស៊ើបអង្កេតរបស់លោក ដែលត្រូវ បានគេផ្សព្វផ្សាយពេលលោកគេចចេញពីប្រទេសកម្ពុជា នៅឆ្នាំ២០០៧ថា " ដោយសារតែ ឃាតកម្មនោះមានពាក់ព័ន្ធជាមួយលោក ហុក ឡង់ឌី លោកមិនអាចធ្វើអ្វីបានទាំងអស់ ។ លោក មិនបានចាប់ខ្លួនឃាតកទេ ។ ខ្ញុំមានការសោក ស្តាយខ្លាំងណាស់ ដោយជីវិតរបស់មនុស្សគ្មាន



កំហុសម្នាក់ត្រូវបានសម្លាប់ ហើយក្នុងឋានៈជា នាយប៉ូលីសម្នាក់ខ្ញុំមិនអាចធ្វើអ្វីបាន "។

នៅក្នុងសៀវភៅកំណត់ហេតុប្រចាំថ្ងៃរបស់ នាង ដែលគេបានរកឃើញក្រោយពេលនាងត្រូវ បានគេសម្លាប់, ពិសិដ្ឋ ពិលិកា បានរៀបរាប់ពី ទំនាក់ទំនងស្នេហារបស់នាង និងលោកនាយក រដ្ឋមន្ត្រី ហ៊ុន សែន និងការទំនាក់ទំនងជាមួយ លោក ហុក ឡង់ឌី ។

នៅក្នុងកំណត់ហេតុចុងក្រោយមួយ ដែល នាងបានសរសេរនៅថ្ងៃច័ន្ទ ទី១០ ខែឧសភា ឆ្នាំ ១៩៩៩ វេលាម៉ោង៩ និង១៥នាទីព្រឹក នាងបាន រៀបរាប់ថា " លោកអគ្គនាយកជាតិ ហុក ឡង់ឌី បានណាត់នាងឱ្យទៅជួបដោយសារតែលោក មានរឿងដែលត្រូវប្រាប់នាង ។

នាងបន្តថា " គាត់បានបញ្ជូនអង្គរក្សពីរនាក់ ឱ្យមកដឹកខ្ញុំ ។ ខ្ញុំបានស្នើឱ្យប្អូនស្រីរបស់ខ្ញុំទៅ ជាមួយ ហើយយើងបានទៅទាំងអស់គ្នា ។ ខ្ញុំ មានការត្រេកអរ និងព្រួយបារម្ភលាយឡំជាមួយ គ្នា ហើយខ្ញុំគិតថា ប្រាកដជាមានសារអ្វីមួយពី



បង ហ៊ុន សែន ហើយ ។ ខ្ញុំបានជួបជាមួយលោក ហុក ឡង់ឌី នៅក្នុងភោជនីយដ្ឋាន មួយក្នុងស្រុក កៀនស្វាយ ក្នុងទីដ៏ស្ងាត់មួយ ។ គាត់បានប្រាប់ ខ្ញុំឱ្យលាក់ខ្លួននៅកន្លែងណាមួយ មួយរយៈសិន ព្រោះលោកជំទាវ ប៊ុនរ៉ានី បានខឹងនឹងខ្ញុំខ្លាំង ណាស់ ហើយមានគម្រោងការសម្លាប់រូបខ្ញុំ..." នេះជាការរៀបរាប់របស់អ្នកស្រី ពិសិដ្ឋ ពិលិកា នៅក្នុងសៀវភៅកំណត់ហេតុរបស់នាង ។

ពិលិកា ក៏បានរក្សាទុកនូវកំណាព្យស្នេហា មួយ ដែលសរសេរដោយលោកនាយករដ្ឋមន្ត្រី ផ្ទាល់ដៃផ្ញើជូននាងផងដែរ ។

គេអាចរកមើលកំណត់ហេតុប្រចាំថ្ងៃរបស់ នាង និងឯកសារទាក់ទងផ្សេងមួយចំនួនទៀត តាមគេហទំព័រ http://pisethpilika.free.fr និង http://pisethpilika.free.fr/02.htm ។

គួរជំរាបផងដែរថា ក្រុមគ្រួសាររបស់អ្នកស្រី ពិសិដ្ឋ ពិលិកា **តទៅទំព័រទី០៦**

The Khmer Post Directory

East Coast Publication

Regional Editor : Pin Samkhon

Email : pinsamkhon@gmail.com

Writers : Mam Yin
Kim Phean
Im Loeurm
Bopea Chum

Advertising

Marketing Manager:

Sabane Thach

Phone : 267-253-3947

Email : sabane.thach@gmail.com

West Coast Publication

RegionalEditor : Sovannara Meach

Writers : Kim Saroeurn
Ra Neat
Sophea Rith
Mey Sampos
Chan Kosal
Sovann Rith

Phone: (562) 313-2129

Email: sovannara04@yahoo.com

# អ្នកច្បាប់ : ការតស៊ូខ្មែរកម្ពុជាក្រោមនឹងមានវាសនាដូចកោះទីម័រខាងកើត

## +ថាច់ ង៉ុកថាច់ : បញ្ហាមិនបានទៅលេង ស្រុកមិនជាចោទទេ ! ប៉ុន្តែការដែលអត់ស្រុកទៅលេងវាជាបញ្ហាចោទ !

**ប៉ារីស, ខ្មែរប៉ុស្តិ៍ : មាជ សុវណ្ណារ៉ា**

●●●នាយកវិទ្យាស្ថានសិទ្ធិមនុស្សរដ្ឋហាវៃ ដែលជាទីប្រឹក្សាផ្នែកច្បាប់របស់សហព័ន្ធខ្មែរ



ប្រធាននាយកដ្ឋានសិទ្ធិមនុស្សរដ្ឋហាវ៉ៃឈ្មោះបណ្ឌិត Joshua Cooper កំពុងពន្យល់ផែនទីទាក់ទងខ្មែរកម្ពុជាក្រោម

កម្ពុជាក្រោម បណ្ឌិត Joshua Cooper បានថ្លែងថា សហព័ន្ធខ្មែរកម្ពុជាក្រោមដែលកំពុងតែធ្វើចលនាតស៊ូបែបអហិង្សាតាមផ្លូវច្បាប់នៅលើឆាកអន្តរជាតិបច្ចុប្បន្នអាចនាំឱ្យពួកគេទទួលបាននូវសិទ្ធិសេរីភាពជាក់ជាមិនខាននៅពេលអនាគត ។

អ្នកច្បាប់រូបនេះ បានប្រៀបប្រដូចការតស៊ូរបស់បងប្អូនខ្មែរក្រោមទៅនឹងការតស៊ូរបស់ពលរដ្ឋនៃប្រទេសកោះទីម័រខាងកើតដែលបានទាមទារឯករាជ្យស្វយ័តរៀបចំគ្រប់គ្រងប្រ-ទេសដោយខ្លួនឯងក្នុងនាមជាម្ចាស់ជនជាតិដើមនោះ ។

កាលពី10ឆ្នាំមុននៅថ្ងៃទី 19 ខែឧសភា ឆ្នាំ 1999 ប្រទេសទីម័រខាងកើតដែលមានប្រជាជនមិនដល់មួយលាននាក់ផង បានដណ្តើមឯករាជ្យពេញលេញពីអំណាចអាណានិគមច្រើនរយឆ្នាំបន្តគ្នាតាំងពីជំនាន់គ្រប់គ្រងអំណាចដោយប្រទេសព័រទុយកាល់ និងមកដល់ប្រទេសឥណ្ឌូ-នេស៊ីទៀត ។

លោកបណ្ឌិតច្បាប់ផ្នែកសិទ្ធិមនុស្ស Cooper បានបញ្ជាក់ឱ្យដឹងដែរថា អំពីប្រវត្តិនៃការតស៊ូរបស់ជនជាតិដើម គឺកើតចេញពីការចាប់ផ្តើមតស៊ូបន្តិចម្តងៗរហូតដល់ធ្វើឱ្យអង្គការសហប្រជាជាតិទទួលស្គាល់ជាផ្លូវការ ។

ការទាំងនោះវាទាក់ទងទៅនឹងសិទ្ធិសេរីភាពការតស៊ូដោយអហិង្សាដូចជា បញ្ហាខ្មែរកម្ពុជាក្រោម គឺគេត្រូវនិយាយដល់សន្ធិសញ្ញាបារាំងវាងអាណានិគមយួនទៅនឹងច្បាប់សិទ្ធិមនុស្សអន្តរជាតិ ។

លោកនាយកប្រតិបត្តិនៃសហព័ន្ធខ្មែរកម្ពុជាក្រោម ថាច់ ង៉ុកថាច់ បានថ្លែងថា ក្នុងនាមជាខ្មែរកម្ពុជាក្រោម ពិសេសក្រុមយុវជនត្រូវរួបរួមគ្នាដើម្បីក្រោកឈរប្រយុទ្ធប្រឆាំងដោយអហិង្សាតាមផ្លូវច្បាប់ ដើម្បីរំដោះសេរីភាពនៃសិទ្ធិរស់នៅជាពលរដ្ឋម្ចាស់ទឹកដីម្ចាស់ជនជាតិដើម ។

លោក ថាច់ ង៉ុកថាច់ សូមអំពាវនាវឱ្យខ្មែរក្រោមខ្មែរ លើខ្មែរ និងកណ្តាលត្រូវសាមគ្គីគ្នាដើម្បីជាតិរស់ពលរដ្ឋមានប្រទេស ។ ដោយយើងត្រូវគិតយកមកពិចារណានូវពាក្យមួយឃ្លា ដែលមានន័យថា "ការមិនបានទៅលេងស្រុកមិនជាចោទទេ ! ប៉ុន្តែការដែលអត់ស្រុកទៅលេង វាជាបញ្ហាចោទទៅវិញ !" ។



លោក ថាច់ង៉ុកថាច់



មេធាវី ស្ស៊ីរ៉ូម ជនជាតិបារាំងដែលជាមន្ត្រីតំណាងឱ្យសហគមន៍អឺរ៉ុបបានបញ្ជាក់ថា ការលើកឡើងអំពីចលនាសិទ្ធិមនុស្ស ការសិក្សាពីរបបអាណានិគម ការទទួលស្គាល់ឯករាជ្យចេញពីនឹមអាណានិគម និងច្បាប់អន្តរជាតិផ្សាភ្ជាប់ជាមួយនឹងបញ្ហាខ្មែរកម្ពុជាក្រោម គឺជារឿងដែលសហព័ន្ធខ្មែរកម្ពុជាត្រូវតស៊ូដើម្បីទាមទារសិទ្ធិសេរីភាពរំដោះខ្លួនចេញពីនឹមជិះជាន់ ។

បច្ចុប្បន្នជនជាតិដើមខ្មែរកម្ពុជាក្រោមរស់ក្រោមរបបអាណានិគមថ្មីយួនហាណូយដោយក្តីវេទនាទុក្ខលំបាកបំផុត ទាំងផ្លូវកាយនិងផ្លូវចិត្តនូវការទទួលរងការរើសអើងពូជសាសន៍ពីជនជាតិយួនគ្រប់សម័យកាល ដោយពួកយួនបានហាមប្រាមមិនឱ្យមានជំនឿក្នុងផ្លូវសាសនាព្រះពុទ្ធបំបាត់ការរៀនសូត្រភាសាខ្មែរតាមទីវត្តអារាម វប្បធម៌ប្រពៃណី ត្រូវគេបំផ្លាញស្ទើរទប់ទល់មិនបានមកដល់សព្វថ្ងៃ ។ ជាមួយនឹងផ្ទុវប្តូរសម្លាប់ខ្លួន ពីរីរបុរស ឬព្រះ-សង្ឃខ្មែរក្រោមដើម្បីឱ្យពួកយួនបន្តរក្សាទីវត្តអារាមខ្មែរអក្សរសាស្ត្រខ្មែរប្រពៃណីវប្បធម៌ខ្មែរបន្តឱ្យរស់រានកុំឱ្យបាត់បង់ទៀតផង ។

បច្ចុប្បន្នខ្មែរក្រោមតាមរយៈស្ថាប័នសហព័ន្ធខ្មែរកម្ពុជាក្រោមដែលជាអង្គការកំពូលជួយជ្រោមជ្រែងលើឆាកអន្តរជាតិដើម្បីបំណងទាមទារឱ្យអាជ្ញាធរនៃរបបកុម្មុយនិស្តក្រុងហាណូយគោរពសិទ្ធិមនុស្ស សេរីភាព ជំនឿសាសនា និងបញ្ឈប់ទង្វើរើសអើង ។ លើសពីនេះទៀត គឺការទាមទារនូវសិទ្ធិស្វយ័តសម្រេចវាសនាខ្លួន ។

បច្ចុប្បន្នសហព័ន្ធខ្មែរកម្ពុជា ក្រោមស្ថិតក្នុងសមាជិកនៃគណ:កម្មការនាយកក្នុងអង្គការតំណាងឱ្យប្រជាជាតិដែលគ្មានអាសនៈរបស់ខ្លួននៅក្នុងអង្គការសហប្រជាជាតិ (UNPO) ដែលអង្គការមួយ នេះមានសមាជិក 69 តំណាងឱ្យជនជាតិដើម69ប្រទេស ផ្សេងៗគ្នា ។

អ្នកស្រី ម៉ែកហ្គិ មើតី មន្ត្រីសម្របសម្រួលគំរោងអង្គការ UNPO បានថ្លែងថា ក្នុងបុព្វ-ហេតុមួយនៃការតស៊ូដើម្បីជនជាតិដើមដែលត្រូវបាត់បង់មាតុភូមិបានកោតសរសើរចំពោះការវិវត្តនៃចលនារបស់សហព័ន្ធខ្មែរកម្ពុជាក្រោមដែលបានទាក់ទាញឱ្យមានការគាំទ្រពីមជ្ឈដ្ឋានពិភពលោកដើម្បីសិទ្ធិសេរីភាពខ្មែរក្រោម ។

សហព័ន្ធខ្មែរកម្ពុជាក្រោមមួយនេះ បានប្រែក្លាយពីចលនាមួយដែលគ្មានគេស្គាល់ទាល់តែសោះនៅលើសកលលោកឆ្ពោះទៅជាស្ថាប័នមួយដែលអង្គការសហប្រជាជាតិទទួលស្គាល់ថា ជាក្រុមដែលកំពុងធ្វើសកម្មភាពតស៊ូដោយអហិង្សាស្របតាមផ្លូវច្បាប់អន្តរជាតិ និងជាក្រុមសកម្ម ។

លោកស្រី ម៉ែកហ្គិ មើតី មានប្រសាសន៍បន្តថា "60ឆ្នាំក្រោយពីជនជាតិដើមខ្មែរក្រោមការបាត់បង់ទឹកដី និងសិទ្ធិសេរីភាពមកស្ថានភាពសេដ្ឋកិច្ច និងជីវភាពរបស់ពួកគេក៏កាន់តែអាក្រក់ទៅៗ ។ ខ្មែរក្រោមទទួលរងការគាបសង្កត់ជាច្រើន ហើយស្ថានភាពសេដ្ឋកិច្ចសង្គមជនជាតិដើមខ្មែរកម្ពុជាក្រោមស្ថិតក្នុងកម្រិតមួយអន់ទៅៗគឺស្ថិតនៅទាបជាង **តទៅទំព័រ០៧**

(តមកពីទំព័រទី ០៤)

## ខួប១០ឆ្នាំរំលឹកវិញ្ញាណខន្ធ...

បានចាកចេញពីប្រទេសកម្ពុជា ទៅរស់នៅប្រទេសបារាំង ក្រោយពីព្រឹត្តការណ៍បាញ់សម្លាប់អ្នកស្រី នាប៉ុន្មានខែក្រោយមកក្នុងហេតុផលសន្តិសុខ និងសុវត្ថិភាពផ្ទាល់ខ្លួន ។ ចំណែកឯកកូនប្រុសរបស់អ្នកស្រី បានចាកចេញទៅតាមឪពុករបស់ខ្លួន គឺលោក ខែប្រសិទ្ធិ ទៅកាន់ប្រទេសអូស្ត្រាលីនៅពេលនោះ ។

យោងតាមជីវិតប្រវត្តិរបស់អ្នកស្រី ដែលត្រូវបានចុះផ្សាយថា ពិសិដ្ឋ ពិលិកា កើតនៅឆ្នាំ ១៩៦៥ ក្នុងទីក្រុងភ្នំពេញ ក្នុងត្រកូលអ្នកមានការអប់រំ ដែលឪពុករបស់នាងជាសាស្ត្រាភាសាបារាំង នៅមហាវិទ្យាល័យគរុកោសល្យ ។ ឪពុករបស់នាងឈ្មោះ ឌីក ហាល់ និងម្តាយឈ្មោះ ម៉េង មូនី ។ នាងមានប្អូនស្រីពីរនាក់ គឺ ពាលី និង ដារ៉ូ ។ ពិលិកា ឌីក អ៊ាបពិលិ ។ បន្ទាប់ពីឪពុកម្តាយរបស់នាងបានស្លាប់ក្នុងរបបខ្មែរក្រហម ពិសិដ្ឋ ពិលិកា និងប្អូនទាំងពីររបស់នាង ត្រូវបានចិញ្ចឹមបីបាច់ដោយឪពុកមា ។ ពួកគេបានប្តូរឈ្មោះដើមទៅជា សៅ ពីលិ, សៅ ពាលី និង សៅ ដារ៉ូ ដោយយកត្រកូលតាមឪពុកមា សៅ ពិសិដ្ឋ ។ ក្រោយមក សៅ ដារ៉ូ ជាប្អូនស្រីរបស់នាងបានស្លាប់ ។

នៅឆ្នាំ១៩៨០ ដោយមានការជ្រោមជ្រែងពីម្តាយមីងរបស់នាងឈ្មោះ ម៉េង សុណាលី ដែលជាគ្រូបង្រៀននៅសាលាវិចិត្រសិល្បៈ ពីលិ បានចាប់ផ្តើមសិក្សារៀនសូត្រជានាថនារី ។ នាងបានបញ្ចប់ការសិក្សាមុខវិជ្ជារបាំនេះ នៅឆ្នាំ ១៩៨៨ ហើយនាងបានបន្តធ្វើការឱ្យសាលាវិចិត្រសិល្បៈជាអ្នករបាំឈានមុខមួយរូប ។

ដោយសារសម្ផស្សដ៏ផូរផង់ និងទេពកោសល្យដ៏ប៉ិនប្រសប់របស់នាង ពីលិបានក្លាយជាតារាភាពយន្តដ៏មានប្រជាប្រិយភាព ។ នាងត្រូវបានផលិតកម្មវត្តភ្នំ អញ្ជើញឱ្យថតខ្សែភាពយន្តរឿងដំបូងមួយសម្រាប់អាជីវិតសិល្បៈរបស់នាង គឺរឿង " ស្រមោលអន្ធការ " ។ ចាប់ពីពេលនោះមកនាងបានក្លាយជាតារាសម្តែងដ៏ល្បីមួយរូប នៅទូទាំងប្រទេសកម្ពុជា ។ នៅឆ្នាំ១៩៨៩ នាងបានប្តូរឈ្មោះមកជា ពិសិដ្ឋ ពិលិកា ។

នាគ្រាដែលនាងជាប់មមាញឹកជាមួយនឹងការថតខ្សែភាពយន្ត គឺជាឱកាសដែលនាងបានជួបជាមួយលោក ខែ ប្រសិទ្ធិ ដែលជាតារាសម្តែងប្រុសដ៏ល្បីកាលជំនាន់នោះ ។ ពួកគេទាំងពីរបានក្លាយជាប្តីប្រពន្ធនឹងគ្នា ។

នៅឆ្នាំ១៩៩២ ពួកគេទាំងពីរមានកូនប្រុសម្នាក់ ដោយដាក់ឈ្មោះថា ខែ ប្រសិទ្ធិ ឡេសក្តិ ពិលិកា បានសម្តែងខ្សែភាពយន្តចំនួន៦០រឿង និងបានសម្តែងក្នុងឈុតឆាកផ្សាយពាណិជ្ជកម្មជាច្រើន ក្រៅពីនោះ នាងបានចូលសម្តែងនៅប្រទេសនានា រួមមាន ឥណ្ឌា ថៃ វៀតណាម ជប៉ុន សិង្ហបុរី ចិន កូរ៉េ រុស្ស៊ី បារាំង អ៊ីតាលី ដាណាម៉ាក និងសហរដ្ឋអាមេរិក ។

ថ្ងៃទី៦ ខែកក្កដា ឆ្នាំ១៩៩៩ ពិលិកា ត្រូវបានបាញ់ប្រហារដោយជនប្រដាប់អាវុធ នៅពេលខណៈនាងកំពុងដើរទិញកង់ នៅម្តុំផ្សារ អូរឫស្សី ក្នុងរាជធានីភ្នំពេញ ។ នាងទទួលរងរបួសយ៉ាងធ្ងន់ ដោយសារគ្រាប់កាំភ្លើងជាច្រើនគ្រាប់ ហើយត្រូវបានបញ្ជូនទៅសង្គ្រោះបន្ទាន់នៅមន្ទីរពេទ្យកាល់ម៉ែត្រ ។


ពិធីហែរបុណ្យសពរបស់អ្នកស្រី ពិសិដ្ឋ ពិលីកា

នាងបានទទួលមរណភាពនៅវេលាម៉ោង៦ និង៣០នាទីព្រឹក ថ្ងៃទី១៣ ខែកក្កដា ឆ្នាំ ១៩៩៩ ។

គេនៅចាំបានថា ក្រោយពេលព្រឹត្តការណ៍បាញ់ប្រហារទៅលើរូបនាង នាថ្ងៃទី៦ ខែកក្កដា ១៩៩៩ នោះ មនុស្សរាប់សែននាក់បានទួញយំ និងចោមរោមស្តាប់ដំណឹងតាមវិទ្យុ មើលព័ត៌មានតាមកាសែត អំពីការវិវត្តន៍នៃស្ថានភាពជម្ងឺរបស់នាង ។ នៅថ្ងៃទី១៣ និងទី១៤ ខែកក្កដា ឆ្នាំ១៩៩៩ មនុស្សរាប់ម៉ឺននាក់ បានចូលរួមក្នុងពិធីដង្ហែ និងបូជាសពរបស់នាង ។

គេបានឃើញហ្វូងមនុស្សមកពីបណ្តាខេត្ត-ក្រុងទាំងនោះ ស្លៀកសពាក់ស សម្រក់ទឹកភ្នែកស្តាយស្រណោះតារាភាពយន្ត និងជានាថការីដ៏ល្បីល្បាញរូបនោះដែលបានលាចាកពីពួកគេ ។

គេរាល់គ្នារំពឹងថា យុត្តិធម៌នឹងកើតមានសម្រាប់ ពិសិដ្ឋ ពិលិកា ព្រមទាំងក្រុមគ្រួសាររបស់នាង និងសម្រាប់ពួកគេនៅថ្ងៃណាមួយ ។

នៅមិនទាន់មានការជំនុំជំរះណាមួយលើកករណីឃាតកម្មលើរូបអ្នកស្រី ពិសិដ្ឋ ពិលិកា ដោយតុលាការឯករាជ្យណាមួយ ដែលគេបានរំពឹងទុកតាំងពី១០ឆ្នាំមុននោះមកផង ។ មនុស្សម្នាដែលពាក់ព័ន្ធយ៉ាងសំខាន់ គឺលោក ហុក ឡងឌី បានស្លាប់ដោយឧប្បទ្ទវហេតុធ្លាក់យន្តហោះនៅខេត្តស្វាយរៀង កាលពីយប់ថ្ងៃទី ៩ វិច្ឆិកា ឆ្នាំ ២០០៨ ។

គួរបញ្ជាក់ថា មុនពេលស្លាប់ លោក ហុក ឡងឌី អគ្គស្នងការនគរបាលជាតិ បានមកក្លាយជាជន្លងរបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ដែលបានធ្វើឱ្យរដ្ឋាភិបាលកម្ពុជា ក្លាយជារដ្ឋាភិបាលសម្ព័ន្ធក្រុមគ្រួសារយ៉ាងរឹងមាំក្នុងចំណោមថ្នាក់អ្នកដឹកនាំនៃស្ថាប័នកំពូលៗរបស់ជាតិ មកពីគណបក្សប្រជាជនកម្ពុជា ។

ក៏នៅមិនទាន់មានការចាប់ខ្លួនជនដៃដល់ពាក់ព័ន្ធណាម្នាក់ ក្នុងរឿងក្តីឃាតកម្មតារាភាពយន្តដ៏ល្បីឈ្មោះនេះនៅឡើយដែរ បើទោះជាមានការចង្អុលបង្ហាញរបស់លោក ហេង ពៅ និងការបង្ហាញឯកសារភស្តុតាងមួយចំនួន ដែលអ្នកស្រី ពិសិដ្ឋ ពិលិកា បានបន្សល់ទុកយ៉ាងច្រើនបែបណាក៏ដោយ ។

ក្រុមមនុស្សល្បីៗ ដែលត្រូវគេបាញ់ប្រហារទាំងនោះរួមមាន : អ្នកស្រី ពិសិដ្ឋ ពិលិកា , កញ្ញា ទូច ស៊ុននិច , កញ្ញា តាត់ ម៉ារីណា តារាចម្រៀងខារ៉ាអូខេខ្មែរ (រងគ្រោះដោយការជះទឹកអាស៊ីត ពីភរិយាអ្នកធំម្នាក់នៃទីស្តីការគណរដ្ឋមន្ត្រី ), កញ្ញា ពៅ បញ្ញាពេជ្រ (តារាចម្រៀងខ្មែរ), អតីតចាងហ្វាងកាសែតសម្លេងយុវជនខ្មែរ គឺលោក ទន់ ច័ន្ទ , អតីតចាងហ្វាងកាសែតឧត្តមគតិខ្មែរ គឺលោក ធន់ ប៊ុនលី , អតីតរដ្ឋលេខាធិការក្រសួងមហាផ្ទៃ គឺលោក ហូ សុខ និងលោក ឱម រដ្ឋសាឌី អតីតអ្នកតំណាងរាស្ត្រមកពីគណបក្សហ្វ៊ុនស៊ិនប៉ិច, អ្នកធ្វើអត្ថាធិប្បាយវិទ្យុតាព្រហ្ម គឺលោក ជូរ ជេតដ្ឋារិទ្ធ , ប្រធានសហជីពសេរីកម្មករកម្ពុជា គឺលោក ជា វិជ្ជា ។ល។ និង ។ល។ សមត្ថកិច្ចប៉ូលីស និងតុលាការ ត្រូវបានគេមើលឃើញថា ពុំបានយកចិត្តទុកដាក់គ្រប់គ្រាន់ដើម្បីចាប់ជនល្មើសមកផ្តន្ទាទោសតាមច្បាប់ឡើយ ។

ក្រុមអ្នកឃ្លាំមើលសិទ្ធិមនុស្សនៅកម្ពុជា ក៏បានធ្វើការកត់សម្គាល់ផងដែរថា ពលរដ្ឋស្លូតត្រង់ ដោយការរំលោភយកដីធ្លីពីសំណាក់អ្នកកាន់អំណាចមួយចំនួន អ្នកកាសែតដែលរិះគន់អំពើពុករលួយរបស់រដ្ឋាភិបាល មានលោក ហង់ ចក្រា ចាងហ្វាងកាសែតខ្មែរម្ចាស់ស្រុកជាដើម និងសកម្មជនការពារសេរីភាពមួយចំនួនទៀត ត្រូវបានតុលាការកាត់សេចក្តីដាក់ពន្ធនាគារ ឯតំណាងរាស្ត្របក្សប្រឆាំងមានជាអាទិ៍ : លោក ហូ វ៉ាន់ អ្នកស្រី មូ សុខហួ ត្រូវបានរដ្ឋសភា ដែលគ្រប់គ្រងដោយគណបក្សប្រជាជនកម្ពុជា ដកអភ័យឯកសិទ្ធិ ដើម្បីផ្តល់លទ្ធភាពដល់តុលាការរបស់ខ្លួនចាត់ការតាមនីតិវិធីច្បាប់ ។

មន្ត្រីអ្នកនាំពាក្យស្ថានទូតអាមេរិកប្រចាំប្រទេសកម្ពុជា លោក ចន ចនសុន ត្រូវបានបណ្តាញព័ត៌មានស្រង់សំដីចំពោះចំណាត់កាលថ្មីៗ របស់តុលាការទៅលើក្រុមអ្នករិះគន់រដ្ឋាភិបាលថា នៅកម្ពុជាប្រព័ន្ធតុលាការហាក់ដូចជាកំពុងត្រូវគេប្រើ ដើម្បីកំហែងអ្នកទាំងឡាយដែលរិះគន់ទង្វើរបស់មន្ត្រីរបស់រដ្ឋាភិបាល ៕




**ដោយ : គឹម ហៀន** ***(តពីលេខមុន)***

●●●លោកយាយក៏បន្ថែម :

- វាជាក្មេងចេះគួរសមណាស់ ហើយតស៊ូព្យាយាមខ្លាំងណាស់ ។

វិរៈ ក៏បន្ទរឡើងតាមសំដីលោកយាយដែរ :

-ចៅមិនបានដឹងថាគេជាសាច់ញាតិរបស់បុប្ផាសោះ ទើបតែជួបគ្នាជាលើកដំបូងនៅពោធិ៍ចិន-តុង គេធ្វើឱ្យចៅមានអារម្មណ៍ល្អយ៉ាងខ្លាំង ។ ឥឡូវទើបដឹងថា គេជាចៅដ៏ល្អរបស់លោកយាយ ធ្វើឱ្យចៅកាន់តែមានអារម្មណ៍ល្អថែមទៀត ។

ពេលទទួលទានអាហារថ្ងៃត្រង់ចប់ហើយ វិរៈ ចង់ទៅពិនិត្យភូមិស្រុកគេបន្តិច មុននឹងលាត្រឡប់ទៅភ្នំពេញវិញ ។ អ្នកគ្រូក៏ហៅច្រកឱ្យមកបើកឡានតាក់ស៊ី បើកដើរកំសាន្តលេងក្នុងភូមិ ។ នាងមិនព្រមឱ្យយករថយន្តស៊ីវិលបើកតាមភូមិទេ ព្រោះនាងយល់ថា ធ្វើឱ្យអ្នកស្រុកភូមិចាប់អារម្មណ៍ពីវត្តមានយោធាចូលមកតាមភូមិឋានរបស់គេ គឺជាការសំដែងឫទ្ធិមួយអាចធ្វើឱ្យអ្នកមានសន្តានចិត្តខាងខ្មែរក្រហម មានការកត់សំគាល់ និងស្អប់ខ្ពើម ។

នាងបានអង្គុយបង់ក្រោយជាមួយសង្សារ ឯនាយពលបាលឯកអង្គុយបង់ខាងមុខជាមួយនាយច្រក។

រថយន្តបានលូនចូលសន្សឹមៗ ទៅតាមភូមិឋាន ដែលមានផ្ទះក្បឿងជញ្ជាំងក្តារធំខ្ពស់នោះតិចទេ តែផ្ទះប្រក់ស្លឹកត្នោត សង់បន្ទបលើសសរឈើតូចៗ ទ្រុឌទ្រោមនោះមានច្រើន ។ ក្មេងតូចៗ នៅលេងតាមផ្លូវលំ ឃើញរថយន្តចូលភូមិក៏ដេញតាមមើលដូចសត្វចម្លែក ។ ក្នុងចំណោមក្មេងទាំងនោះ ក៏មានប្អូនពៅរបស់ច្រកដែរ អាយុប្រហែលជា១០ឆ្នាំ ។ អ្នកគ្រូបញ្ជាមិនឱ្យឈប់នៅផ្ទះរបស់ច្រកទេ ព្រោះមិនចង់ឱ្យអ្នកជិតខាងគេដឹងថា ច្រក មានសាច់ញាតិជាយោធានាំឱ្យមានការលំបាកក្នុងការទំនាក់ទំនងទៅថ្ងៃក្រោយ នាងខ្លាចពាក្យ "ទូកទៅកំពង់នៅ" ។

វិរៈ បានសង្កេតឃើញភូមិស្រុករួចហើយ ក៏មានចិត្តស្រពាប់ស្រពោនយ៉ាងខ្លាំង ព្រោះគេយល់ថា អ្នកស្រុកមានជីវភាពតោកយ៉ាកយ៉ាងនេះ ជាកត្តាដ៏ល្អមួយឱ្យពួកខ្មែរក្រហមអូសទាញប្រឆាំងនឹងរដ្ឋាភិបាលលោក លន់ នល់ ។ ហើយអ្នកក្រីក្រទាំងនេះ ពិតជាចាំពេលវេលាល្អ នឹងក្រោកឡើងឆក់ប្លន់ទ្រព្យសម្បត្តិរបស់អ្នកមានផ្ទះធំទ្រនំខ្ពស់មិនខាន ។

ពេលត្រឡប់មកដល់ផ្ទះលោកយាយភ្លាម វិរៈ បានស្នើរឿងមួយ ដែលធ្វើឱ្យអ្នកផ្សេងៗស្រឡាំងកាំង :

- លោកយាយ ចៅយល់ឃើញថា លោកយាយមិនអាចបន្តរស់នៅ នៅក្នុងភូមិនេះបានទៀតទេ យាយត្រូវរកមធ្យោបាយទៅរស់នៅភ្នំពេញ ទើបមានសុវត្ថិភាពជាងទីនេះ ។ ឯអូនបុប្ផា ត្រូវតែគិតប្តូរទៅបង្រៀននៅភ្នំពេញឆាប់ៗនេះទៅ ព្រោះស្ថានភាពសព្វថ្ងៃ មើលទៅអូននៅធ្វើគ្រូស្រុកនេះ ហាក់ដូចរស់នៅក្នុងបន្លា ។ អូនត្រូវគិតគូរឱ្យបានលឿន យកទាំងប្អូនច្រកទៅរៀននៅភ្នំពេញផង ។ ក្នុងការរកសាលានៅភ្នំពេញ ជាការលំបាកតែទុកបងជួយក្នុងរឿងនេះ ។ សុំទៅតែខ្លួនមុនក៏បានដែរ ច្បាប់ទម្លាប់ចាំគិតក្រោយ ព្រោះលោករដ្ឋមន្ត្រីក្រសួងអប់រំជាឪពុករបស់អាពូកម៉ាក់បង លោកនាយកវិទ្យាល័យដូនពេញជាមិត្តភ័ក្តិ និងជាសិស្សជំនាន់ច្បងកាលរៀននៅវិទ្យាល័យស៊ីសុវត្ថិជាមួយគ្នា។ គ្មានការអីលំបាកទេ ។

លោកយាយ ដែលមានចិត្តជាប់ជំពាក់ទៅលើផ្ទះដែលគាត់បានរស់នៅអស់មួយជីវិតរបស់គាត់ទៅហើយ ឱ្យគាត់ចាកចេញជារឿងមួយលំបាកទទួលយកបានណាស់ ។ ម្តាយ បុប្ផា បានអង្វរឱ្យលោកយាយទៅរស់នៅភ្នំពេញជាមួយគ្នា មិនដឹងជាប៉ុន្មានសារតែគាត់មិនដែលយល់ព្រមទេ ។ ម្តងនេះចៅប្រសារមិនទាន់បានទទួលស្គាល់ មកអង្វរសុំពីរឿងដដែលនេះ បានធ្វើឱ្យគាត់គិតគូរយ៉ាងច្រើន ។

ដោយត្រូវចេញដំណើរត្រឡប់ទៅភ្នំពេញវិញចៅ វិរៈ ក៏ទទូចសុំម្តងទៀត :

- លោកយាយ ! លោកយាយត្រូវគិតគូរឱ្យបានឆាប់គ្រោះថ្នាក់សម្រាប់ បុប្ផា គ្រោះថ្នាក់សម្រាប់លោកយាយមានច្រើនណាស់ ហើយមានគ្រប់ពេលវេលាផង មិនចាំថាយប់ ឬថ្ងៃឡើយ ។ ចំណែកឯអូនបុប្ផាវិញ ត្រូវជួយរំលឹកលោកយាយពីរឿងនេះ ។ មិនអាចរង់ចាំបានយូរទៀតទេ ។ ឯប្អូនច្រកវិញ ពេលវត់តាក់ស៊ីទៅភ្នំពេញ ត្រូវឈោងទៅបុរីកីឡា ឱ្យស្គាល់អង្គភាពរបស់បង ព្រោះបើបងចេញទៅសមរ-ភូមិ អង្គភាពរបស់បងតាំងនៅទីនោះជានិច្ច ។ យើងអាចទាក់ទងរកគ្នានៅទីនោះបាន ។ និយាយចប់ភ្លាម វិរះ លើកដៃលាអ្នកគ្រប់គ្នារថយន្តស៊ីវិលក៏បរចេញទៅ ។

**សូមរង់ចាំអានភាគបន្តនៅលេខក្រោយ**



(តមកពីទំព័រទី ០៥) **អ្នកច្បាប់ : ការតស៊ូខ្មែរកម្ពុជាក្រោម...**

កិរិតជីវភាពជនជាតិយួនច្រើនណាស់ ។

គួរបញ្ជាក់ថា កាលពីថ្ងៃទី13 ខែមិថុនា ខែមុនសហព័ន្ធខ្មែរកម្ពុជាក្រោមបានរៀបចំខួបឆ្នាំទី60នៃការបាត់បង់ទឹកដីកម្ពុជាក្រោម ដែលមាន



មនុស្សចំរុះជាតិសាសន៍នៃអង្គការម្ចាស់ជនជាតិដើម UNPO អង្គការសិទ្ធមនុស្សអន្តរជាតិរួមគ្នាប្រារព្ធធ្វើនៅលើទឹកដីនៃប្រទេសបារាំង ដែលម្ចាស់ប្រទេសមួយនេះ បានធ្វើអាណានិគមមកលើខ្មែរកម្ពុជាក្រោមដោយរួចហើយ ក៏បានកាត់ទឹកដីកម្ពុជាក្រោមឱ្យទៅស្តេចយួន បាវ ដាយ ។

ការជួបជុំគ្នានោះបានប្រមូលផ្តុំគ្នាដោយអ្នកច្បាប់អន្តរជាតិល្បីៗក្នុងការជួយផ្តល់យោបល់ឱ្យដល់សហព័ន្ធខ្មែរកម្ពុជាក្រោមដែលកំពុងធ្វើចលនាអហិង្សាស្របតាមច្បាប់អង្គការសហប្រជាជាតិក្នុងឆន្ទៈស្វែងរកសិទ្ធស្វយ័តសម្រេចវាសនាជនជាតិមាតុភូមិដែលកំពុងរងគ្រោះដោយរបបផ្តាច់ការយួនកុម្មុយនិស្ត ។

លោក ថាច់ ង៉ុកថាច់ ថ្លែងថា ក្រោយការរំលឹកខួបនៃការបាត់បង់ទឹកដីនេះទៅ ក្រុមសហព័ន្ធរបស់លោកនឹងរៀបចំការតវ៉ាតាមលក្ខណៈផ្លូវច្បាប់ តវ៉ាទៅតាមគណៈកម្មការ 21របស់អង្គការសហប្រជាជាតិដើម្បីជំរុញឱ្យរដ្ឋាភិបាលយួនដកនឹមអាណានិគមចេញពីការគ្រប់គ្រងទឹកដីកម្ពុជាក្រោម ដោយបន្តជំរុញទៅដល់ក្រុមហ្សឺណែវក្រុមប្រឹក្សាសិទ្ធិមនុស្សឱ្យមានការស៊ើបអង្កេតដាក់តំនាបទៅលើរដ្ឋាភិបាលយួនចំពោះមូលហេតុនៃការរំលោភសិទ្ធិមនុស្សមកលើខ្មែរក្រោម ។ ដោយលោក ថាច់ ង៉ុកថាច់ បានបញ្ជាក់ថា "យើងនឹងជំរុញតាមលក្ខណៈតុលាការអន្តរជាតិ" ៕

# មឿង សុន ឈឺក្បាលរឿងប្រាសាទអង្គរវត្ត

**ភ្នំពេញ, ខ្មែរប៉ុស្តិ៍ : ស៊ុម សុភាឫទ្ធិ**

•••លោក មឿង សុន ប្រធានមូលនិធិទ្រទ្រង់អរិយធម៌ខ្មែរ ដែលបានសម្ដែងនូវកង្វល់ចំពោះវាសនារបស់ប្រាសាទអង្គរវត្តជាសម្បត្តិបេតិកភណ្ឌពិភពលោក ហើយត្រូវពួកឈ្មួញចោរវន្ធដាប់ថ្មបំភ្លឺភ្លើងនៅតាមជញ្ជាំង ក្នុងអង្គសន្និសីទកាសែតនោះ ត្រូវរដ្ឋាភិបាលប្ដឹងពីបទញុះញង់ផ្សព្វផ្សាយព័ត៌មានមិនពិត ។

បន្ទាប់ពីលោកធ្វើអត្ថាធិប្បាយចប់ មន្ត្រីរដ្ឋាភិបាលបានឱ្យមេធាវីដាក់ពាក្យបណ្ដឹងប្រឆាំងចំពោះលោក មឿង សុន ហើយលោកមានការព្រួយបារម្ភពីសុវត្ថិភាពក៏រត់គេចខ្លួនទៅប្រទេសបារាំង ។ ពេលនេះតុលាការក្រុងភ្នំពេញបានកាត់ទោសឱ្យជាប់គុករយៈពេល2ឆ្នាំ និងពិន័យជាទឹកប្រាក់ជាង3000ដុល្លារ ។

សាលក្រមតុលាការក្រុងភ្នំពេញ ដែលមានលោក ឆាយ គង់ ជាចៅក្រមបានបញ្ជាឱ្យចាប់ខ្លួនលោក មឿង សុន ដាក់គុកព្រៃសរយៈពេល 2ឆ្នាំ ពិន័យជាប្រាក់7លានរៀល ស្មើនឹង 1.750 ដុល្លារ និងបញ្ជាក់ឱ្យបង់ប្រាក់8លានរៀល ស្មើនឹង 2000ដុល្លារទៅរដ្ឋាភិបាលតាមផ្លូវច្បាប់ ។

លោកប្រធានមូលនិធិទ្រទ្រង់អរិយធម៌ខ្មែរ ត្រូវរដ្ឋាភិបាលដាក់ពាក្យបណ្ដឹងកាលពីថ្ងៃទី2 មិថុនាកន្លងមកនេះ ពីបទដែលលោកនិយាយរិះគន់គម្រោងដាក់អំពូលភ្លើងថ្មីនៅប្រាសាទព្រះអង្គរវត្ត ដាក់ភ្ជាប់ខ្សែរពិដានសម្រាប់បំភ្លឺភ្ញៀវទេសចរដែលលោកថា ធ្វើឱ្យប៉ះពាល់ដល់បរិស្ថាន និងក្ដៅដល់ថ្មអង្គរនេះទៀត ។

លោក ប៉ាល់ ចាន់តារា មេធាវីរបស់រដ្ឋាភិបាលបានប្រាប់ក្រុមអ្នកយកព័ត៌មានថា បណ្ដឹងពីបទផ្សព្វផ្សាយមិនពិតស្ដីពីបញ្ហាដូចគ្នានេះក៏ត្រូវប្ដឹងកាសែតភាសាខ្មែរចំនួន2ទៀត ដែលមាននិន្នាការគាំទ្ររដ្ឋាភិបាលក្នុងនោះ កាសែតរស្មីកម្ពុជា និងកាសែតកម្ពុជាថ្មីផងដែរ ។ ប៉ុន្តែរដ្ឋាភិបាលមិនទាន់មានព័ត៌មានទាក់ទងនឹងបញ្ហានេះទេ ។

យោងតាមកាសែត The Cambodia Daily បានដកស្រង់សម្ដីរបស់លោក សំ សុគង់ មេធាវីរបស់លោក មឿង សុន បានស្នើឱ្យសវនាការផ្អែកលើមូលហេតុថា ករណីនេះមិនបានឆ្លងកាត់ដំណើរស៊ើបអង្កេតឱ្យបានសមស្របនោះទេ ។ កូនក្ដីរបស់ខ្ញុំកាលពីថ្ងៃ ទី23 មេសា មិនបាននិយាយពាក់ព័ន្ធទៅនឹងប្រាសាទអង្គរវត្តទេ ។

លោក សំ សុគង់ បន្តថា លោកចង់ឱ្យសាកសួរសាក្សីបន្ថែមទៀត និងឱ្យបញ្ចូលឯកសារនៃសំណុំរឿងមុនពេលកាត់ក្ដី ។

លោក ឯក ចេងហួត ព្រះរាជអាជ្ញារង ក្រុងភ្នំពេញ បានលើកឡើងថា លោក មឿង សុន ផ្សព្វផ្សាយព័ត៌មានមិនពិត មានបំណងញុះញង់ឱ្យប្រជាពលរដ្ឋមានចលាចលទូទាំងផ្ទៃប្រទេស ។ កាលពីមុនពលរដ្ឋគ្មាននរណាដឹងទេ ប៉ុន្តែពេលលោក មឿង សុន លើកឡើងធ្វើឱ្យពលរដ្ឋផ្ទុះកំហឹងឡើងតែម្ដង ។

លោក សំ សុគង់ ក៏ព្យាយាមលើកសម្ដីកូនក្ដីរបស់ខ្លួនថា នេះវាជាការព្រួយបារម្ភរបស់កូនក្ដីក្នុងនាមជាពលរដ្ឋស្រឡាញ់ប្រាសាទអង្គរវត្ត ហើយសុំឱ្យ ហ៊ុន សែន អន្តរាគមន៍ ។ ពេលដែលលោក មឿង សុន លើកឡើងនោះ គឺមិនមានប្រតិកម្មអ្វីគួរឱ្យកត់សម្គាល់សោះឡើយ ។


និជ្ជិតការជាងដាក់អំពូលភ្លើង

គួរបញ្ជាក់ថា រដ្ឋាភិបាលកម្ពុជាបានប្រើប្រាស់ប្រព័ន្ធតុលាការដើម្បីបំបាក់ស្មារតី ក្នុងនោះរួមមានក្រុមអង្គការសង្គមស៊ីវិល អ្នកកាសែត និងមន្ត្រីគណបក្សប្រឆាំងជាបន្តបន្ទាប់ដូចជា លោកស្រី មូរ សុខហួរ តំណាងរាស្ត្រមណ្ឌលកំពត និងលោក ហូរ វ៉ាន់ តំណាងរាស្ត្រមណ្ឌលភ្នំពេញ លោក ហង្ស ចក្រា ចាងហ្វាងកាសែតខ្មែរម្ចាស់ស្រុក លោក ដាំ សិទ្ធ ចាង ហ្វាងកាសែតមនសិការខ្មែរ លោក មឿង សុន ប្រធានមូលនិធិទ្រទ្រង់អរិយធម៌ជាដើម ។


លោក មឿង សុន ពេលធ្វើសន្និសីទកន្លងមក

ចំណែកលោកស្រី ជា វណ្ណាត អតីតនាយិកាមជ្ឈមណ្ឌលអភិវឌ្ឍន៍សង្គមបានមានប្រសាសន៍ថា សេចក្ដីសម្រេច ព្រមទាំងបណ្ដឹងបរិហារកេរ្តិ៍ផ្សព្វផ្សាយព័ត៌មានមិនពិត នៅពេលថ្មីៗនេះមានច្រើន និងធ្វើឱ្យប៉ះពាល់ដល់ការអនុវត្តច្បាប់ប្រឆាំងនឹងអំពើពុករលួយដែលគេរង់ចាំជាយូរមកហើយនោះ ។

លោកស្រីបន្តថា តើវានឹងប៉ះពាល់យ៉ាងណាប្រសិនបើប្រជាជនគ្មានសេរីភាពក្នុងការបញ្ចេញមតិ គ្មានវិធីដើម្បីប្រយុទ្ធប្រឆាំងទៅនឹងអំពើពុករលួយទេ ។

រីឯអង្គការសិទ្ធិមនុស្សអន្តរជាតិ Human Right Watch ដែលមានមូលដ្ឋាននៅប្រទេសអង់គ្លេស បានចេញសេចក្ដីថ្លែងការណ៍រិះគន់ចំពោះប្រព័ន្ធតុលាការកម្ពុជាពុំឯករាជ្យភាពលើការសម្រេចសេចក្ដី ដោយសារតែអំពើពុករលួយស្ថិតនៅក្រោមឥទ្ធិពលអ្នកនយោបាយ ៕

# កោតសរសើរ កន្និដ្ឋា ម៉ម



*Philadelphia,* **ដោយ : ខ្មែរប៉ុស្តិ៍**

●●●នាង កន្និដ្ឋា ម៉ម ជាបុត្រីទី៣ ក្នុងបងប្អូនចំនួន៧នាក់ នាងបានមកដល់សហរដ្ឋអាមេរិក និងម្តាយ អ្នកស្រី កញ្ញនា នាដើមឆ្នាំ ១៩៩៣ ។

កន្និដ្ឋា ម៉ម បានសម្រេចអនាគតដ៏ប្រសើរ និងទទួលបរិញ្ញាប័ត្រឧត្តមសិក្សានៃសកលវិទ្យាល័យ ឌីវរ៉ៃ " DEREY UNIVERSITY " កាលពីថ្ងៃ ២៨ មិថុនា ឆ្នាំ២០០៩

**Bachelor of Science Degree in Technical Managermant**

មុននេះប្រមាណជាង១០ឆ្នាំ កន្និដ្ឋា បានចេញផុតពីជីវភាពភិតភ័យ ខ្វះមុនខ្វះក្រោយនៃគ្រួសារខ្មែរមួយ រស់នៅក្នុងជំរំជនភៀសខ្លួនជាយដែនខ្មែរ-ថៃ ជាមួយបងប្អូន៧នាក់ ក្នុងបន្ទុកឪពុកម្តាយជាយុទ្ធជនអ្នកតស៊ូ ស្ម័គ្រប្រយុទ្ធប្រឆាំងនឹងរបបកុម្មុយនីស្ត ដើម្បីសិទ្ធិសេរីភាព ។

នៅសហរដ្ឋអាមេរិក កន្និដ្ឋា ដោយបានដឹងថា ឪពុកម្តាយមានភាពចាស់ជរា និងស្ថិតក្នុងសភាពក្រីក្រ នាងបានសម្រេចចិត្តផ្អាកការសិក្សានៅសលកវិទ្យាល័យមួយរយៈ ដើម្បីប្រកបការងាររកថវិកាមកជួយទប់ទល់ភាពខ្វះខាត និងជួយសម្រួលបន្ទុកឪពុកម្តាយ ក្នុងការសិក្សារបស់ប្អូន ជាកូនភ្លោះ៣នាក់នោះទៀតផង ។ ទោះបីជាមានស្ថានភាពលំបាកលំបិនយ៉ាងណាក៏ដោយ ក៏ កន្និដ្ឋា បានខិតខំទៅប្រកបការងារផង និងទៅបន្តការសិក្សាឡើងវិញនៅសកលវិទ្យាល័យលុះត្រាបានសម្រេចជោគជ័យ ហើយប្តេជ្ញាតាំងចិត្តថា " នឹងបន្តការសិក្សារហូតបានទៅដល់ថ្នាក់ “MASTER DEGREE” នៅអនាគតខាងមុខ " ។

ខ្មែរប៉ុស្តិ៍ សូមកោតសរសើរ ហើយចាត់ទុកថា នេះជា " យុវនារីខ្មែរសម័យគំរូ" បាន ៕

# កូនខ្មែរនៅឡុងប៊ិចចង់ក្លាយជា គ្រូក្បាច់គុនល្បុក្កតោ



លោក សាន គីមស៊ាន




កីឡាករ កីឡាការិនីហាត់ក្បាច់គុនបុរាណខ្មែរ

**ភ្នំពេញ, ខ្មែរប៉ុស្ដិ៍ : ប៊ុត បូរ**

●●●ដោយសារតែមាននិស្ស័យស្រឡាញ់វិស័យក្បាច់គុនប្រដាល់បុរាណខ្មែរនោះ បានញ៉ាំងឱ្យកូនខ្មែរ-អាមេរិកាំងម្នាក់ ដែលរស់នៅទីក្រុងឡុងប៊ិច រដ្ឋកាលីហ្វ័រញ៉ា សហរដ្ឋអាមេរិក បានចំណាយពេលវេលាដ៏មានតម្លៃមកក្រេបជញ្ជក់ហ្វឹកហាត់ក្បាច់គុនល្បុក្កតោនៅស្រុកកំណើតរបស់ខ្លួន ។

ក្នុងក្ដីអំណួតចំពោះការចំណាយពេលវេលាមកហ្វឹកហាត់ ក្បាច់គុនល្បុក្កតោនៅស្រុកខ្មែរនោះ យុវជន Tommy បាន តាំងចិត្តថា នឹងយកចំណេះដឹងទៅបង្ហាត់កូនខ្មែរនៅទីក្រុងឡុងប៊ិចបន្តទៀត ដើម្បីថែរក្សាកេរមរតកដូនតាឱ្យគង់វង្ស និងផ្សព្វផ្សាយដល់ជាតិសាសន៍ផងដែរ ។

Tommy ក្នុងវ័យ16ឆ្នាំ ដែលម្ដាយមានដើមកំណើតជា ជនជាតិខ្មែរ និងឪពុកជាជនជាតិអាមេរិក បានឱ្យដឹងថា នៅពេលដែលគេធំដឹងក្ដី ហើយម្ដាយបានរៀបរាប់ពីស្រុកកំណើតនៅប្រទេសកម្ពុជា បានធ្វើឱ្យគេមានអារម្មណ៍ស្រឡាញ់នូវកេរមរតករបស់ខ្មែរ ។ ជាពិសេសប្រាង្គប្រាសាទបុរាណនៅតំបន់អង្គរដែលមានទាំងឆ្លាក់នូវចម្លាក់ជាច្រើនរស់រវើកដែលទាក់ទងទៅនឹងក្បាច់គុនបុរាណយ៉ាងល្អប្រណីត ។

Tommy បន្ទាំងក្ដីញញឹម ថាជារៀងរាល់ថ្ងៃ រូបគេក៏តែងស្រម៉ៃថានឹងបានមកលេងស្រុកកំណើតខាងម្ដាយ និងហាត់រៀនក្បាច់គុននៅស្រុកខ្មែរឱ្យស្ទាត់ជំនាញទៀតផង ។ ប៉ុន្តែជាសំណាងល្អនៅថ្ងៃមួយបានប្រទះឃើញកន្លែងបង្ហាត់ក្បាច់គុននៅស្រុកខ្មែរ តាម Web site ធ្វើឱ្យខ្លួនត្រេកអរយ៉ាងខ្លាំងលុះដល់ពេលវាកងធំក៏មករៀននៅសាលាបណ្ឌិតសភាល្បុក្កតោក្រុងភ្នំពេញ រហូតដល់ពេលនេះ ។

កូនខ្មែរអាមេរិករូបនេះ បានអះអាងថា រយៈពេលមួយខែនេះ គាត់បានហាត់ក្បាច់គុនការ៉ាតេផង និងល្បុក្កតោផង ហើយគោលដៅដែលខ្ញុំបាន គឺក្បាច់គុនល្បុក្កតោ ហើយពេលនេះគាត់ក៏បានជាជើងឯកក្រមាខ្មៅ ។ នៅពេលរៀនចប់នឹងវិលទៅអាមេរិកយកចំណេះដឹងនេះទៅបង្ហាត់ដល់កូនខ្មែរ និងជនជាតិផ្សេងៗឱ្យស្គាល់ពីកេរដំណែលដូនតាខ្មែរ ។

ចំណែកលោក សាន គីមស៊ាន ប្រធានក្លឹបសហព័ន្ធល្បុក្កតោបានឱ្យដឹងថា សព្វថ្ងៃនេះ មានក្លឹបនៅតាមបណ្ដា ខេត្ត-ក្រុងមួយចំនួន ដូចជា ខេត្តតាកែវ ខេត្តកំពត ខេត្តបាត់ដំបង ពោធិ៍សាត់ សៀមរាប ដែលគ្រូបង្ហាត់ដល់សិស្សនូវក្បាច់គុនល្បុក្កតោ ការ៉េតេ យូដូ ស៊ីដូ ។ ក្នុងមួយឆ្នាំមានសិស្សខ្មែរ និងបរទេសមកសុំហាត់រៀនប្រហែល1000នាក់ ដែលសិស្សទាំងនោះ សុទ្ធតែមានសមត្ថភាពខ្ពស់ ។

លោក សាន គីមស៊ាន បន្តថា ក្បាច់គុនល្បុក្កតោនេះមានប្រវត្តិតាំងពីយូរយាណាស់មកហើយ ដែលបុព្វបុរសយើងបានបន្សល់ទុក ហើយក្បាច់គុននេះជួយឱ្យអ្នកហាត់រៀនមានសភាពរហ័សរហួនរាងកាយមាំមួនសុខភាពល្អ ។ ជាពិសេសសិស្សដែលរៀនផ្នែកក្បាច់គុនបុរាណទាំងអស់សុទ្ធតែក្លាយជាគ្រូប្រដាល់ល្បីៗទៀតផង ។

ក្បាច់ល្បុក្កតោនេះអ្នកខ្លះយល់ថា "បុកបុះ ឬសម្បុកាតោ" ពីព្រោះជាកីឡាមួយប្រភេទដែលប្រមូលផ្ដុំទៅដោយក្បាច់គុន និងស្នៀត ។ ប៉ុន្តែបើតាមវចនានុក្រមរបស់សម្ដេច ជួន ណាត បានពន្យល់ថា "ដំបងខ្លីមួយប្រភេទសម្រាប់កាន់ផ្ទាប់ជាប់កំភួនដៃជាគ្រឿងការពារ ដំបងវែង ឬបុកបុះការពារខ្លួនដែលមានប្រវត្តិតាំងពីសម័យបុរាណមកម៉្លេះ ។

ក្បាច់គុនល្បុក្កតោនេះ នៅតាមជនបទ និងទីក្រុងមួយចំនួនបាត់បង់សើរអស់ គឺមាននៅតាមកន្លែងមួយចំនួនប៉ុណ្ណោះ ។ ការដែលគេនិយមហាត់ក្បាច់នេះ ពីព្រោះវាសំយោគនៃស្នៀតកីឡាខ្មែរជាច្រើនដូចជាក្បាច់ប្រដាល់សេរី ចំបាប់ គុនដំបង ដែលពេលប្រយុទ្ធគេអាចប្រើដៃទទេ ឬឧបករណ៍ការពារក៏បានដោយសារអ្នកហាត់ភាគច្រើនមានជំនឿលើខ្លួន ឯងថា អាចយកឈ្នះលើគូសត្រូវបានដោយងាយ ៕

រាយការណ៍បន្ថែមដោយ : ចាន់ កុសល



យុវជន Tommy និងមិត្តភក្តិ (Tommy សញ្ញាព្រួញ )



សកម្មភាពហ្វឹកហាត់ក្បាច់គុនបុរាណខ្មែរ នៅក្នុងក្លឹប

$400 Half Color

# HONG KONG SUPERMARKET

## FAMER´S BEST

571 ADAMS AVE.PHILADELPHIA,PA19120
Tel: 215-72801300 Fax: 215-728-1600

**Newly Renovated. Added new section . Clean and Improved management !**

ទើបនឹងកែលំអរថ្មីឡើងវិញ -បន្ថែមផ្នែកលក់ថ្មីទៀត ហាងស្អាត ហើយបង្កើនគុណភាព គ្រប់ គ្រង

**Weekly Sale**

លក់ចុះថ្លៃរៀងរាល់សប្តាហ៍

OPEN 7DAY 8:00-9:00

SỮA ÔNG THỌ
LONGEVITY SWEETENED CONDENSED MILK
$1.79/can

Vinacafe
INSTANT COFFEE MIX
CÀ PHÊ HÒA TAN
三合一即溶咖啡
$2.99/bag

Café Du Monde
COFFEE AND CHICORY
$3.49/ea

Mazola
Cholesterol Free
CORN OIL
$7.99

Việt Hương
FISH SAUCE
$2.99

$7.99/lb

MAMA
$6.99/box

- ចំណាយ $140ដុល្លារ ទទួលបានអង្ករស្រូវស ២៥ ផោន
- ចំណាយ $100ដុល្លារ ទទួលបានទូវភេសជ្ជៈ : ឬមីកញ្ចប់មួយប្រអប់ (តម្លៃ 8.99 )
- ចំណាយ $25 ដុល្លារទទួលបានទឹកសណ្តែកមួយដប ឬទឹកត្រីមួយដប ។

តមកពីលេខ៣៩

# បក្សប្រឆាំងខ្មែរបង្ហាញពីយុទ្ធសាស្ត្រឈ្នះឆ្នោត

**ហ្វីឡាដែលហ្វីញ៉ា, ខ្មែរប៉ុស្តិ៍ : ពិន សំខុន**

••• **ថាវ៉ូ ភិម** ខ្ញុំស្តាប់ទៅគឺតម្លៃនៃយុវជនជំនាន់ក្រោយទៅដែលជំរុញលទ្ធិប្រជាធិបតេយ្យ ហើយអស់សង្ឃឹមនឹងមនុស្សជំនាន់មុន មិនបានចាត់ទុកថាប្រយោជន៍ជាធនធានមនុស្ស ។ ខ្ញុំចង់រម្លឹកថា យុវជនឆ្នាំ 1993 ពុំទាន់មានសិទ្ធិបោះឆ្នោតនៅឡើយទេ គឺអ្នកជាប់ឆ្នោតពេលនោះ គឺដោយសារ មនុស្សជំនាន់ចាស់ មនុស្សដែលគេគ្រប់គ្រងទាំងអស់ ។

ដូច្នេះបើគេអស់ចិត្តនៅពេលនេះ ហើយត្រូវបណ្តុះមនសិការជាតិឡើងវិញ មួយទៀតសម្រាប់យុវជនជំនាន់ក្រោយត្រូវបណ្តុះស្មារតីជាតិជាបន្តដែរ ។ ឧទាហរណ៍ឥឡូវនេះ ក្រោលមានគោច្រើន ហើយគោចាស់វាឈឺ ត្រូវព្យាបាល ហើយកូនគោមានច្រើនហើយ បើលោកមិនបង្ហាត់វាឱ្យចេះភ្ជួរស្រែទេ កុំសង្ឃឹមថាអាចចេះភ្ជួរស្រែបានទៅថ្ងៃក្រោយ ខ្ញុំដែលនៅខាងក្រៅនេះ ភ័យខ្លាចតែគោយើងក្លាយជាគោព្រៃទាំងអស់តែប៉ុណ្ណោះទេ ។

**សម រង្ស៊ី :** ខ្ញុំប្រហែលជានិយាយមិនស្របនឹងអ្វីដែលខ្ញុំចង់និយាយ ខ្ញុំសុំឆ្លើយដូច្នេះថា គេធ្វើនយោបាយគេមិនដែលធ្វើលេខដកទេ គឺធ្វើលេខបូក ។

រីឯកត្តាទាំង5ដែលខ្ញុំនិយាយ អម្បាញ់មិញគឺជាកត្តាបន្ថែមលើអ្វីដែលយើងមានរួចទៅហើយ ។ ដូច្នេះយើងមិនចាំបាច់និយាយវាធ្វើអ្វី ។ ទី2 គឺយើងយកកត្តាហ្នឹងមកកំណត់យុទ្ធសាស្ត្រ យើងទៅច្បាំងយើងមើលសមរភូមិបើច្បាំងយើងធ្វើនៅលើទឹកយើងត្រូវធ្វើកប៉ាល់ ឬនាវា បន្តិចទៀតយុវជនចេញមកហូរដូចទឹក គឺយើងត្រូវរៀបអាវុធយ៉ាងណាឱ្យអាចច្បាំងលើភូមិសាស្ត្រពិសេស គឺយុវជននេះឯងហើយត្រូវចាប់កម្លាំងនេះឱ្យបាន ។

គណបក្ស សម រង្ស៊ី បានរៀបចំមុនគេ គឺចលនាយុវជនប្រជាធិបតេយ្យ (គណបក្សប្រជាជនកម្ពុជាធ្វើក្រោយយើងទេ) គឺឱ្យយុវជនទាំងនោះរៀបចំបោះឆ្នោតដោយខ្លួនគេរៀបចំតំណាងរបស់ខ្លួននៅតាមភូមិ តាមស្រុក ហើយយើងឱ្យយុវជនហ្នឹងឈរឈ្មោះបោះឆ្នោតនៅតាមឃុំក្នុងបញ្ជីថ្នាក់ខ្ពស់ឱ្យអាចជាប់ឆ្នោតបានក្នុងទំហំ30% បន្ថែមលើកម្លាំងចាស់ៗ គឺឱ្យយុវជនហ្នឹងរៀនធ្វើការមុននឹងបំរើថ្នាក់ជាតិ គឺនៅក្នុងឃុំហ្នឹង5ឆ្នាំទៅ នៅថ្នាក់ស្រុក 5ឆ្នាំទៅ បម្រើថ្នាក់ខេត្ត5ឆ្នាំទៅ ហើយបើគាត់ផ្តើមនៅអាយុ 20ឆ្នាំ គឺ15ឆ្នាំក្រោយមកគេអាចបម្រើជាថ្នាក់ដឹកនាំជាតិបានហើយ ។បើអ្នកទាំងនោះផ្តើមដឹកនាំថ្នាក់ជាតិពីអាយុ30 ឆ្នាំ ឬ35ឆ្នាំ គេអាចជាអ្នកដឹកនាំជាតិថ្នាក់ កំពូលបានក្នុងអាយុ45ឆ្នាំ ដូច្នេះមិនចាញ់អូបាម៉ា ប៉ុន្មានទេ ។




**ពិន សំខុន :** ខ្ញុំសង្កេតឃើញថា នៅហ្វីឡាដែល-ហ្វីយ៉ា នេះពលរដ្ឋខ្មែរ ទោះជាក្រក៏ដោយ បានខិតខំជួយលុយសម្រាប់ស្រុកខ្មែរ ដោយចាយប្រាក់គ្រួសារ 6-7លានដុល្លារ ក្នុងមួយឆ្នាំៗ ក្នុងនោះមានចាយជួយគណបក្សនយោបាយផងដែរ ហើយខ្ញុំឮគេ និយាយថាបានជួយលុយទៅគណបក្ស ច្រើនហើយគេមិនដែលស្តាប់សំឡេងពួកយើងខាងក្រៅសោះ នេះជាការបន្ទោសមួយពីខាងក្រៅទៅខាងក្នុង ។

រីឯបន្ទោសពីខាងក្នុងមកខាងក្រៅវិញដូចជា សុំកុំឱ្យខាងក្រៅបែកបាក់ចែកគ្នាបង្កើតជាក្រុមតូចៗវានាំឱ្យបែកសំឡេង... នេះជាការបន្ទោសគ្នាទៅវិញទៅមកដែលខ្ញុំចង់ដឹងដែរថា នៅមានទទួលការបន្ទោសអ្វី ឬការបញ្ជូនសំណើរអ្វីមកអ្នកខាងក្រៅផ្សេងទៀតដែរឬទេ ? **តទៅទំព័រទី ១៤**

(តមកពីទំព័រទី ១៣)

## បក្សប្រឆាំងខ្មែរបង្ហាញពីយុទ្ធសាស្ត្រ...

**គឹម សុខា :** ខ្ញុំចង់បញ្ជាក់ថ្ងៃនេះថា បើគ្មានជំនួយពីបងប្អូននៅក្រៅប្រទេសទេ នោះគណបក្សសិទ្ធិមនុស្សពុំអាចទៅបោះឆ្នោតអាណត្តិចុងក្រោយនេះបានទេ ហើយទំនាក់ទំនងដែលយើងបានធ្វើហើយ គឺបងប្អូនជ្រើសរើសតំណាងខ្លួនឯងទៅចូលរួមបោះឆ្នោត ការគ្រប់គ្រងតម្លាភាពក្នុងការចាត់ចែងដោយខ្លួនឯង គឺជាការរៀបចំដែលយើងបានធ្វើរួចហើយ សំណើរបន្ថែម គឺសូមឱ្យឥទ្ធិពលនៃធនធានដែលបងប្អូនបញ្ជូនទៅ ខ្ញុំសូមធ្វើម្តេចឱ្យមានឥទ្ធិពលរឹតតែច្រើនទៅលើលទ្ធិប្រជាធិបតេយ្យនៅកម្ពុជា ។

**សម រង្ស៊ី :** ខ្ញុំឆ្លៀតយកឱកាសនេះ ដើម្បីថ្លែងអំណរគុណដ៏ជ្រាលជ្រៅដល់បងប្អូននៅឯនាយសមុទ្រ ជាពិសេសនៅសហរដ្ឋអាមេរិក ថ្ងៃនេះជាពិសេសនៅផែនស៊ុវេនា នៅហ្វីឡាដែលហ្វីយ៉ា បងប្អូនបានជួយគណបក្ស សម រង្ស៊ី ច្រើនណាស់ ហើយបងប្អូននៅឯក្រៅបាន ទៅចូលរួមចំណែកលើកទឹកដីខ្មែរ ជាប់ជាតំណាងរាស្ត្រមកពីអាមេរិកជាប់បាន4នាក់ មកពីបារាំងបាន3នាក់ មកពីអូស្ត្រាលីជាប់បានម្នាក់ ។ យើងប្រគល់ភារកិច្ចឱ្យធ្វើជាស្ពានសម្រាប់ផ្លាស់គណបក្សយើងនៅស្រុកខ្មែរ ជាមួយនឹងសហគមន៍ខ្មែរនៅគ្រប់ទ្វីបទាំងអស់ ក្នុងពិភពលោក ដោយមានការសប្បាយក្នុងចិត្តទាំងអស់គ្នា ពុំមានការទាស់ចិត្តអ្វីធំដុំនោះ ទេ ។

**សុបិន ថាច់ :** ជាបន្តទៅនេះសូមតាំងសំនួរចម្ងល់ទៅប្រធានគណបក្សនីមួយៗក្នុងរយៈពេល10នាទីម្នាក់ សូមអញ្ជើញតាំងសំនួរទៅគណបក្សសិទ្ធិមនុស្សមុនគេឱ្យមានឱកាសស្គាល់ពីគណបក្សឱ្យបានច្បាស់ :

**ថាវី ញ៉ុយ :** ខ្ញុំមានកិត្តិយសណាស់ដែលបានយោបល់នៅចំពោះមុខឯកឧត្តមតំណាង រាស្ត្រទាំង3 យើងឃើញហើយថា គណបក្សហ៊្វុនស៊ិនប៉ិចបានឈ្នះឆ្នោត ហើយអង្គុយលើអាសនៈមិនជាប់ ខ្ញុំមានសេចក្តីឱ្យបាន ពីព្រោះគណបក្សប្រជាជនកម្ពុជានេះគេ ខ្លាំងណាស់ គេមានបរទេសនៅពីក្រោយខ្នង ហើយធ្វើអ្វីបានស្រេចនឹងចិត្ត គេមិនខ្លាចធ្វើបាប មិនខ្លាសម្លាប់នោះទេ ។ តាមយោបល់ខ្ញុំគឺសុំឱ្យរៀបចំយុទ្ធសាស្ត្រណា ដែលនាំឱ្យយើងរឹងមាំ បើឈ្នះឆ្នោតហើយ កុំឱ្យភ្លេចខ្លួនធ្វើម៉េចឱ្យយើងរឹងមាំ កុំឱ្យចាញ់គេទៅវិញ ។



បារម្ភ ហើយឆ្ងល់ថា ហេតុអ្វីក៏ចេះតែបន្ទោសលោកថាឈ្នះឆ្នោតហើយម្តេចក៏មិនកាន់អំណាចខ្លួនឯង ទៅចូលគណបក្សប្រជាជនទៅវិញ ខ្ញុំគិតថា ប្រហែលជាមានគំនាប ឬគំរាមកំហែងអ្វីមួយដល់រូបលោក ដែលយើងមិនដឹង..។.

ដូច្នេះធ្វើឱ្យខ្ញុំយល់ថា ការតស៊ូក្នុងនយោបាយ គឺជាការលំបាកណាស់ ត្រូវលះបង់ច្រើនណាស់ ទោះបីជាប្រើពេលយូរយ៉ាងណា អស់ទ្រព្យសម្បត្តិច្រើនប៉ុណ្ណាក៏យើងត្រូវតែបន្តយការតស៊ូ ត្រូវតែបន្តសេចក្តីសង្ឃឹមថា ថ្ងៃណាមួយយើងនឹងឈ្នះគណបក្សប្រជាជនកម្ពុជា ហើយយើងពង្រឹងខ្លួនយើងឱ្យអាចកាន់អំណាចឱ្យបានទប់ទល់នឹងគណបក្សប្រជាជនកម្ពុជា

**គឹម សុខា :** ខ្ញុំសុំគាំទ្រទស្សនៈនេះ100% ហើយខ្ញុំជឿថា បទពិសោធន៍ពីមុនមកស្រាប់ យើងត្រូវចេះកែខ្លួនយើង ត្រូវមានអ្វីថ្មីទើបមានសង្ឃឹមថ្មី ដូចប្អូនបានលើកឡើងអម្បាញ់មិញ យុវជនដែលគ្មានអ្វីថ្មីគេមិនមកទេ ហើយយើងត្រូវបន្តបណ្តុះមនសិការជាតិជាបន្ត ពីព្រោះឥឡូវនេះវានៅខ្សោយណាស់ ខ្ញុំបានទៅរៀបពេលទៅធ្វើការបណ្តុះបណ្តាល នេះជាកម្មវិធីក្នុងមួយខែទៅ15ខេត្ត ហើយមួយខេត្តទៅ2ស្រុក ខ្ញុំនិយាយអំពីប្រវត្តិសាស្ត្រ និយាយពីសីលធម៌ និយាយពីសាសនា គឺខ្ញុំបណ្តុះមនសិការសំរាប់ផ្លូវយូរ រីឯគណបក្សប្រជាជនកម្ពុជាគេប្រើលុយសម្រាប់ទិញ ។

ដូច្នេះហើយខ្ញុំនៅតែជឿថា យើងត្រូវតែមានការផ្លាស់ប្តូរខ្លួនយើងជាមុន ទើបទៅផ្លាស់ប្តូរប្រទេសជាតិបាន ។

**ញ៉ែម បុណ្ណារិទ្ធ :** ខ្ញុំចង់បញ្ជាក់ថា បើមានធនធានមនុស្សហើយ បើមានសម្ភារៈហើយ តែគ្មានទឹកចិត្តទេក៏នៅតែមិនឈ្នះដដែល ។ ដូច្នេះយើងត្រូវឱ្យមានការច្បាស់លាស់ហើយ និងការព្យាយាមតស៊ូឱ្យមែនទែនពីព្រោះយុទ្ធសាស្ត្រគេស្រួលណាស់ គឺ ទី1-គេព្យាយាមកុំឱ្យយើងរួបរួមគ្នាបាន បើយើងរួបរួមគ្នាបាន ។ ទី2-គេបំបែកបំបាក់យើងទៀត ដូច្នេះឆ្លើយតបនឹងបងសំខុន ខ្ញុំគិតថា នៅចំពោះមុខរាល់ការបំបែកបំបាក់យើងត្រូវគិតពិចារណាសុំឱ្យព្យាយាមរកការតស៊ូរកការពិតដើម្បីធ្វើឱ្យបាននូវកម្លាំងរួមគ្នាឱ្យទាល់តែបានអ្វីដែល បងស្រីលើកមកពីការបំបែកបំបាក់របស់គេ នៅឆ្នាំ 1993 ខ្ញុំមិនចង់លើករំលងឆ្ងាយទេ។

ដោយសារការពុលនឹងស្រីស្រា ល្បែង... ពេលបងប្អូនទៅស្រុកខ្មែរឃើញការជឿនលឿនមែនស្រីស្រា ល្បែង កន្លែង ខារ៉ាអូខេ កាស៊ីណូ... ទាំងអស់នេះបើយើងមិនត្រៀមរៀបចំសីលធម៌របស់សង្គមយើងឡើងវិញមនសិការជាតិយើងឡើងវិញទេ ។

យើងនឹងគ្មានសង្ឃឹមថា អាចទប់ទល់គេបាននោះទេ ...ខ្ញុំមានសង្ឃឹម នៅថ្ងៃនេះថា បងប្អូនទទួលយកនូវការរួមកម្លាំងគ្នា ដោយផ្តល់នូវកម្លាំងដល់ការតស៊ូរួមគ្នា ហើយសង្កត់ធ្ងន់ជាទីបំផុត មានសម្ភារៈបើគ្មានចិត្តធ្វើអ្វីក៏មិនកើតដែរ ។

**អ៊ូ គីមហួរ :** ខ្ញុំចង់ឱ្យមានការបំភ្លឺទៅលោក សម រង្ស៊ី ថា យុវជនយួនដែលចូលមកកើតកូននៅស្រុកខ្មែរ តើមានបានគិតបារម្ភដល់អ្នកទាំងនោះ ដែលមកកើតនៅស្រុកខ្មែរដែរឬទេ ?

តទៅទំព័រទី ១៥

(តមកពីទំព័រទី ០១)

## តំណាងរាស្ត្រអស់អភ័យឯកសិទ្ធិ...

ដែលចេញមុខការពារក្តីឱ្យគណបក្សប្រឆាំង និងត្រូវរងសម្ពាធនយោបាយប្រឈមនឹងអាចបញ្ចប់អាជីពរបស់ខ្លួនថែមទៀតផង ។ លោក គង់ សំអុន បានសម្រេចចិត្តឈប់ការពារក្តីមុនពេលក្រុមប្រឹក្សាប្រតិបត្តិរបស់គណៈមេធាវីកម្ពុជា គ្រោងនឹងធ្វើការចោទប្រកាន់ពីបទរំលោភក្រមសីលធម៌វិជ្ជាជីវៈដែលធ្វើឡើងដោយលោក គី តិច អតីតប្រធានគណៈមេធាវីកម្ពុជា និងជាមេធាវីរបស់ ហ៊ុន សែន ។

លោកស្រី មូរ សុខហួរ បានឱ្យដឹងថា ទោះបីជាប្រឈមនឹងការលំបាកយ៉ាងណាក៏លោកស្រី ត្រូវតែរកមេធាវីដើម្បីការពារក្តីនៅថ្ងៃទី24 កក្កដា ខាងមុខដែរ ។ ពេលនេះលោកស្រី មានការបារម្ភក្នុងការបញ្ចុះបញ្ចូលរកមេធាវី ដែលមានទឹកចិត្តក្លាហានហ៊ានការពារក្តីហើយ អ្នកដែលចេញមុខការពារក្តីឱ្យខ្ញុំងាយនឹងរងសម្ពាធពីខាងនយោបាយ ។

លោកស្រី មូរ សុខហួរ បានបញ្ជាក់ថា ខ្ញុំគិតថាពេលគ្មាននរណាចង់ការពារក្តីឱ្យខ្ញុំទេ ហើយខ្ញុំក៏មិនចង់ឱ្យពួកគេរងគ្រោះថ្នាក់ដោយសារខ្ញុំដែរ ។ ប្រសិនបើរកមេធាវីមិនបានមានតែឡើងតុលាការខ្លួនឯង ។

លោកស្រី មូរ សុខហួរ បន្តថា លោកស្រីមានគម្រោងឡើងតុលាការនៅថ្ងៃទី24 កក្កដា បើទោះបីជាគ្មានមេធាវីក៏ដោយ ។ នេះសបញ្ជាក់ឱ្យឃើញថា ខ្ញុំជាជនរងគ្រោះរបស់នាយករដ្ឋមន្ត្រី ហ៊ុន សែន និងប្រព័ន្ធតុលាការ ហើយគ្មាននរណាហ៊ានប៉ះពាល់រឿងក្តីរបស់ខ្ញុំទេ ។ ប្រការនេះវាស្តែងឱ្យឃើញពីការព្យាយាមបំបែកដាក់ទោសអ្នកហ៊ាននិយាយការពិតព្រមទាំងចង់បានតម្លៃខ្លួនឯង ។ ទោះបីជាគ្មានមេធាវីក៏ឡើងតុលាការដែរ ហើយខ្ញុំមិនធ្វើការសុំទោសទេ គឺសុខចិត្តជាប់គុក ដើម្បីការពារតម្លៃស្ត្រីខ្មែរ ។

លោក សុក សំអឿន ដែលត្រូវលោកស្រី មូរ សុខហួរ ពឹងឱ្យធ្វើជាមេធាវីបានឱ្យដឹងថា ខ្ញុំមិនអាចធ្វើជាមេធាវីការពាក្តីឱ្យលោកស្រីបានទេ ពីព្រោះខ្ញុំមិនមែនជាមេធាវីឯកជនទេ ។ ជាពិសេសយើងបានយល់ព្រមជាមួយគណៈមេធាវីថា ខ្លួនការពារឱ្យតែអ្នកក្រីក្រមិនអាចរកមេធាវីខ្លួនឯងបានទេ ចំណែកលោកស្រីមិនអាចចាត់ទុកជាអ្នកក្រីក្រទេ ។

រហូតមកដល់ពេលនេះ គណបក្ស សម រង្ស៊ី ពុំទាន់មានលទ្ធភាពរកមេធាវីសម្រាប់ការពាររឿងក្តីរបស់លោក ហូរ វ៉ាន់ និងលោកស្រី មូរ សុខហួរ បានទេ ។ សូម្បីតែលោក ជួង ជូងី មេធាវីរបស់គណបក្សក៏បដិសេធពុំទទួលរឿងក្តីលោកហូរ វ៉ាន់ដែរ ពីព្រោះវាស្មុគស្មាញពាក់ព័ន្ធនឹងមន្ត្រីយោធាជាន់ខ្ពស់22 នាក់ ។

គួរបញ្ជាក់ថា អង្គការ Vital Voices ដែលមានទីតាំងនៅសហរដ្ឋអាមេរិកបានធ្វើការអំពាវនាវតាមអ៊ិនធើរណេតដើម្បីរកលុយឱ្យលោកស្រី មូរ សុខហួរ ជួលមេធាវីការពារក្តី ប៉ុន្តែគេមិនអាចដឹងថា ទទួលបានប៉ុន្មាននោះទេ ៕



(តមកពីទំព័រទី ១៤)

## បក្សប្រឆាំងខ្មែរបង្ហាញពីយុទ្ធសាស្ត្រ...

**សម រង្ស៊ី :** ខ្ញុំមានសិទ្ធិឆ្លើយឬទេ ?

**សុបិន ថាច់ :** អត់ទេ ! សុំឱ្យលោក គឹម សុខា ឆ្លើយជាវេនរបស់គាត់ មានអ្នកសួរទៅគាត់ទេ នៅមាន2-3នាទីទៀត ?

**ហាស់ វៃនលីម :** ខ្ញុំចង់ឮលោក គឹម សុខា និង សម រង្ស៊ី សម្តែងអំពីសម្ព័ន្ធភាពថ្មីនេះអាចនឹងបែកគ្នាវិញបានដែរឬទេ ? បើកាលពីសម្ព័ន្ធភាពលោក សម រង្ស៊ី ជាមួយគណបក្សហ៊្វុនស៊ិនប៉ិច ធ្លាប់បានរួបរួមគ្នាហើយ ក៏បែកទៅវិញបានដែរ ។

**គឹម សុខា :** ខ្ញុំយល់ថា ការបែក មិនបែក មិនមែនទៅលើបុគ្គលទេ គឺទៅលើគោលការណ៍ បើមានគោលការណ៍ច្បាស់លាស់ ។ បើមានលក្ខណៈច្បាស់លាស់យើងមិនអាចបែកគ្នាបានទេ ហើយបើគ្មានគោលការណ៍ គឺមិនត្រឹមតែបែកគ្នាទេ គឺមិនអាចឈ្នះឆ្នោតថែមទៀត ។ ដូច្នេះការរួបរួមជាគោលការណ៍សំខាន់ គឺឈរលើលទ្ធិប្រជាធិបតេយ្យផ្ទៃក្នុង មុននឹងយើងទាមទារលទ្ធិប្រជាធិបតេយ្យទៅអ្នកខាងក្រៅ ។

**សម រង្ស៊ី :** ខ្ញុំឯកភាពទៅលើពាក្យគន្លឹះ ដែលនិយាយអម្បាញ់មិញនេះ ដូចជា សីលធម៌ មនោគមវិជ្ជា គោលការណ៍ គោលជំហរ សរុបទៅគឺទាក់ទងទៅនឹងផ្លូវចិត្ត ឆន្ទៈ គឺជាការផ្លាស់ប្តូរខាងផ្នត់គំនិតដូចជា នៅបារាំងដែលគេធ្វើបដិវត្តនៅឆ្នាំ 1789 គេបានធ្វើការផ្លាស់ប្តូរផ្នត់គំនិតបំផុសគំនិតជឿនលឿនដូចជា វ៉ុលទែ ម៉ុងតេស្គី ស្សង់ស្សាក់រូសូគេបំផុសគំនិតផ្លាស់ប្តូរតាំងពី50មុនបដិវត្តតែឥឡូវនេះដោយសារបច្ចេកទេសជឿនលឿនយើងត្រូវការតែ3ឆ្នាំប៉ុណ្ណោះដើម្បីផ្លាស់ប្តូរ ។

ចំណែកឯយុវជនជាយួនដូចសំនួរអម្បាញ់មិញ ខ្ញុំយល់ថា ទុកឱ្យបងប្អូនកម្ពុជាក្រោម គេអ្នកសួរវិញ គឺទាំងយួនក្មេង ទាំងមនុស្សចាស់បងប្អូនកម្ពុជាក្រោមនឹងដឹងថា នរណាទើបនឹងបន្លំចូលមក នរណាកើតនៅទីនេះហើយធ្វើយ៉ាងម៉េចកុំឱ្យយួនចូលបោះឆ្នោតទាំងចាស់ ទាំងក្មេង ហើយផ្ទុយទៅវិញធ្វើឱ្យខ្មែរឱ្យបាន ។

និយាយពីចរន្តយុវជន នេះគឺជា កត្តាតែមួយទេ យើងដឹងថា យុវជនចំនួនច្រើន ហើយពួកគេក៏មិនមកបោះឆ្នោតឱ្យយើងទទេៗ នោះទេ តែយើងត្រូវចាប់ពួកគេឱ្យបាន យុវជនគឺជាចរន្តឈ្នះ តែមានចរន្តដល់ទៅពីរ 1-គឺចរន្តគណបក្សប្រជាជនកម្ពុជា ដែលគេធ្វើឱ្យយុវជនភ្លើតភ្លើន សូមមើលតែទូរទស្សន៍ខ្មែរទៅនឹងឃើញហើយ ស៊ីផឹក សេពគ្រឿងញៀនតែគណបក្ស សម រង្ស៊ី បង្កើតចរន្ត ។ ទី2- ដែលមានការទទួលខុសត្រូវចំពោះគ្រួសារ ចំពោះសង្គម និងចំពោះជាតិដើម្បីឱ្យក្លាយទៅជាសសរអាចទ្រទ្រង់ជាតិយើងឱ្យបាន ។

**មាស ជា :** កម្ពុជាយើងគោរពបាវចនា ជាតិ សាសនា ព្រះមហាក្សត្រ ។ បាវចនា ចុងក្រោយ គឺព្រះមហាក្សត្រ ដែលមានកិត្យានុភាព ហើយទទួលបានពីចិន ពីយួន រីឯអ្នកប្រជាធិបតេយ្យខំជំរុញ ខ្ញុំចាំបានថាឆ្នាំ 1993 ព្រះករុណាបន្ទាប់ពីបញ្ហោអប្បគមន៍បានសម្រេចឱ្យមាននាយករដ្ឋមន្ត្រីដល់ទៅពីរ ដែលបាននាំឱ្យមានការកាប់សម្លាប់គ្នាឯង មានបងប្អូនខ្ញុំម្នាក់ជាឧត្តមសេនីយ៍បានចូលក្នុងការរងគ្រោះដល់ជីវិតពេលនោះដែរ ។ ...ខ្ញុំសួរថា ចុះបើយើងឈ្នះហើយ ពេលនោះព្រះករុណាមកធ្វើអន្តរាគមន៍ដោយគណបក្សប្រជាជនមិនព្រមដកខ្លួនដោយសារខ្ទង់បរទេសជាដើម តើអ្នកប្រជាធិបតេយ្យនឹងដើរតាមគន្លងដដែលនេះដែរឬទេ ?

**គឹម សុខា :** ខ្ញុំជឿថា ទាំងព្រះមហាក្សត្របច្ចុប្បន្ន ឬព្រះមហាក្សត្រពីមុនលោកមានការឈឺចាប់ដោយសារពួកកុម្មុយនិស្តដែរ ...តែយើងក៏ឥតដឹងថាលោកនឹងគិតអ្វីបន្តទៅទៀតដែរ ។ តែយើងគិតរឿងយើងអ៊ីចឹង លទ្ធផលដែលយើងបានមកនេះយើងឈរលើមូលដ្ឋានច្បាប់ ពុំមែនមូលដ្ឋានបុគ្គលនោះទេ ខ្ញុំជឿថា បើអ្នកប្រជាធិបតេយ្យឈ្នះយើងនឹងឈរលើមូលដ្ឋានប្រជាធិបតេយ្យមូលដ្ឋាន ច្បាប់ យើងឥតឈរលើឥទ្ធិពលបុគ្គលណាទេ ខ្ញុំជឿថាសហគមន៍អន្តរជាតិនឹងគាំទ្រយើង ។

**សម រង្ស៊ី :** ខ្ញុំសុំឆ្លើយតែពីរម៉ាត់ទេ ហ៊្វុនស៊ិនប៉ិចឈ្នះឆ្នោតតែចាញ់ចិត្ត ។ កម្លាំងយើងបើឈ្នះឆ្នោតឈ្នះចិត្តរក្សាជ័យជំនះ ទាំងសន្លឹកឆ្នោតទាំងផ្លូវចិត្ត ។

**យ៉ែម បុណ្ណារិទ្ធ :** ចំពោះខ្ញុំយល់ថា យើង ជាខ្មែរបញ្ហាប្រទេសខ្មែរពុំមែនដោយសារស្ថាប័នទេ តែដោយសារអ្នកដឹកនាំ និងដោយសារបុគ្គលដោយសារអ្នកនយោបាយពុំមានឆន្ទៈពិតប្រាកដចំពោះជាតិតើមានអ្វីខ្លះ ? ឆ្នាំ 1970 គេវាយបំបាក់ស្ថាប័ន ព្រះមហាក្សត្រមួយចោលឆ្នាំ 1975 គេវាយបំបាក់ស្ថាប័នសាសនាមួយចោលឆ្នាំ 1979 គេវាយបំបាក់ស្ថាប័នជាតិចោលទៀត ឬមួយយើងជជែកគ្នាពីបញ្ហាស្ថាប័នដែលនាំឱ្យមានការប៉ះពាល់ដល់អារម្មណ៍អ្នករាជានិយមអ្នកសាធារណរដ្ឋ និយមអ្នកប្រជាធិបតេយ្យទាំងប៉ុន្មានឱ្យហែកហួរគ្នាឱ្យខ្ទេចខ្ទីដូចបរទេសចង់បំបែកយើង ឬមួយក៏យើងត្រូវគិតថា ស្ថាប័នពុំមានទាក់ទងអ្វីនឹងការដឹកនាំប្រទេសទេ ។ ដូច្នេះយើងគួរចៀសវាងនិយាយនូវអ្វីដែលនាំឱ្យមានការបែកបាក់សាមគ្គីគ្នាឱ្យបាន ។

ជុំវិញរឿងយុវជនគណបក្សសិទ្ធិមនុស្សបានទៅបង្រៀនប្រវត្តិសាស្ត្ររាល់ថ្ងៃដល់យុវជនដល់ព្រះសង្ឃដល់ពលរដ្ឋ ដែលតាំងពីឆ្នាំ 1979 មកគ្មាននរណាចង់ឱ្យកូនខ្មែរចេះដឹងពីប្រវត្តិរបស់ខ្លួនទេ គេឥតឱ្យស្គាល់ពីវីរបុរសខ្មែរដែលសុខចិត្តស្លាប់ ដើម្បីជាតិនោះទេ គេឱ្យស្គាល់ប្រវត្តិសាស្ត្រតែមួយគត់ គឺមិត្តភាពម៉ឺនឆ្នាំ ហើយទាំងអស់នេះ តម្រូវឱ្យយើងព្យាយាមតស៊ូឱ្យរឹតតែខ្លាំងថែមទៀត គេមិនលេបប្រទេសយើងដូចពេលមុនទៀតទេ ។

នៅលើផែនទីមានប្រទេសលាវផែនទីប្រទេសខ្មែរមាន ក៏ប៉ុន្តែប្រជាជនដែលរស់នៅលើប្រទេសខ្មែរ ឬប្រទេសលាវបងប្អូនអាចអញ្ជើញទៅមើលឱ្យឃើញថាជានរណា ? ដូច្នេះខ្ញុំសូមអំពាវនាវសូមឱ្យបងប្អូនមានការប្រុងប្រយ័ត្ន ហើយព្យាយាមទប់ទឹកដីរបស់យើងជូនកូនចៅជំនាន់ក្រោយឱ្យបានគង់វង្ស សូមអរគុណ ! ។

**សុបិន ថាច់ :** ខ្ញុំសូមបញ្ចប់កម្មវិធីនាពេលនេះនៅម៉ោង12គត់ ហើយសូមជូនពរឱ្យអស់លោកទាំង3បានធ្វើដំណើរបន្តប្រកបដោយជោគជ័យ ។ ដំណើរសាមគ្គីរបស់ខ្មែរបានចាប់ផ្តើមនៅសតវត្សទី3ដល់ទី13បានចប់សាងបានប្រាសាទរាប់ពាន់ គឺជាការសាមគ្គីដែលមានប្រវត្តិរាប់រយពាន់ឆ្នាំ ដូច្នេះយើងខ្ញុំជាអ្នកជំនាន់ក្រោយចង់ឃើញសាមគ្គីដែលទើបនឹងកើតនោះមានអាយុយឺនយូររហូតដល់បានទទួលនូវលទ្ធិប្រជាធិបតេយ្យពិតប្រាកដសម្រាប់កម្ពុជា ៕

(តមកពីទំព័រទី ០៣)

# ខ្មែរក្នុងប្រព័ន្ធផ្សព្វផ្សាយ..

ដើម្បី ជួយមនុស្សជាទូទៅឱ្យផុតពីរនាំងដែលបាំងសេចក្តីសុខ ដែលបាំងចំណេះ ដែលបាំងសេចក្តីចម្រើន ។ ដើម្បីកុំឱ្យភ្លេចខ្លួន ប្រព័ន្ធផ្សព្វផ្សាយវិជ្ជមានចុងក្រោយនេះ តែងគ្រឿនរំលឹកមនុស្ស ដោយនាំអ្នកឯកទេសដោយនាំឧទាហរណ៍មកជួយសាធារណជននូវករណីដែលនាំឱ្យវិនាសខាតបង់ ឬក៏នាំឱ្យចំណេញដល់ជីវិតដល់សង្គម ។

នៅសហគមន៍ខ្មែរនៃតំបន់ហ្វីឡាដែលហ្វីយ៉ា មនុស្សទូទៅបានផ្តោតសេចក្តីរីករាយ និងសរសើរដោយគ្មានសៅហ្មងដល់ស្ថាប័នមួយចំនួន ធ្វើការមិនគកកំរៃ និងក្នុងការរគារពសីលធម៌ដ៏ខ្ជាប់ខ្ជួន សម្រាប់សុខុមាភាពនៃសហគមន៍ខ្មែរ ដូចជា **សហគមន៍វត្តព្រះពុទ្ធវង្សី** ដែលមានគម្រោងក្នុងឆ្នាំនេះ បង្កើនតុលាការពាណិជ្ជកម្មខ្មែរ បង្កើនសន្តិសុខ បង្កើនភាពរស់នៅឱ្យប្រសើរ... រួចហើយមាន**សមាគមខ្មែរ** ដែលបានបង្ហាញការប្តូរទស្សនៈគ្រប់គ្រង់សេវារបស់ខ្លួនចំពោះសង្គម ក្នុងរូបភាពប្រឹងប្រែង និងទូលំទូលាយបន្ទាប់មកមានសហគមន៍**អ្នកប្រាជ្ញវិបស្សនា** ដែលមានសកម្មភាពច្រើនឆ្នាំ ក្នុងការជួយរំងាប់បញ្ហាផ្លូវចិត្ត និងផ្លូវកាយមានវិបត្តិ... មានសកម្មភាពបរិហារគ្រិស្តសាសនាខ្មែរ " **មីណូណៃ** " ដែលបានបើកកម្មវិធីថ្មីៗ ឱ្យសាធារណជនអាចទទួលការណែនាំក្នុងជីវភាពសង្គម និងសេដ្ឋកិច្ចបែបថ្មីសម្រាប់ការរស់នៅរបស់ខ្លួន ។ រីឯ **កាសែតខ្មែរប៉ុស្តិ៍** ក៏មានតួនាទីមួយដែរ ក្នុងការបើកទ្វារសង្គម និងមនុស្សឱ្យប្រស្រ័យទាក់ទងដោយសន្តិភាព និងដោយសុចរិតជូនសាធារណជនមួយផ្នែកដែរ ។

ថ្វីត្បិតតែ " ខ្មែរប៉ុស្តិ៍ "ឃើញថា សកម្មភាពខ្លួននៅតូចដោយសារទំហំនៃធនធាន ហើយខ្មែរយើងនៅមិនទាន់ជឿស្ថាប័នផ្សព្វផ្សាយថា អាចមានឥទ្ធិពលទៅលើសុខុមាភាពរបស់ខ្លួនក៏ដោយក្តី យើងឃើញខ្មែរស្រទាប់ ៦០% និង ៣០% បានយលកាសែតទៅអានយ៉ាងយកចិត្តទុកដាក់ ហើយបង្ហាញការចូលចិត្តអានដែលជាទម្លាប់ថ្មីរបស់ខ្លួន ចំណែកឯកអ្នក ១០% ពុំទាន់បង្ហាញចំណូលចិត្តរបស់ខ្លួន ថាបានអានខ្មែរប៉ុស្តិ៍នៅឡើយទេ ។ ទោះជាយ៉ាងនេះ ក៏ដោយក្តី ចរន្តទាក់ទងមនុស្សបានផ្លាស់ប្តូរយ៉ាងជ្រាលជ្រៅ នាឆ្នាំចុងក្រោយនេះ ដោយស្រទាប់ពលរដ្ឋ ៦០% បានចេញមុខទាមទារការកែប្រែទម្រង់ការគ្រប់គ្រងរដ្ឋដោយខ្លួនឯង រដ្ឋអំណាចទទួលខ្មែរបីរូបនៅហ្វីឡា ឱ្យចូលជួយគ្រប់គ្រងរដ្ឋ ដោយស្រទាប់អ្នកធនធានតូច ចងក្រងគ្នាជាស្ថាប័នដោយខ្លួនឯង... ហើយពិសេសមានការងារមួយចំនួនត្រូវបានបើកឱ្យខ្មែរចូលធ្វើការ ។ ខ្មែរប៉ុស្តិ៍និយាយពីប្រព័ន្ធផ្សព្វផ្សាយហាក់មានស្មារតីមិនសមស្រប តែខ្មែរប៉ុស្តិ៍ចង់បង្ហាញបំណងពីការចង់រួមចំណែក កកសាងសង្គម ដោយមិនទាន់ចង់ស្លាប់មុននឹងមានគេជឿថា " ខ្មែរប៉ុស្តិ៍ " មានសារៈសំខាន់ដូចជាកាសែតបរទេសឯទៀតដែរ ។

ជឿមិនជឿ "ផែនដីនៅតែវិល" ប្រព័ន្ធផ្សព្វផ្សាយទាំងអស់ ឱ្យតែមានស្មារតីសីលធម៌ក្នុងការផ្សព្វផ្សាយនៅតែមានទម្ងន់ទៅលើការអភិវឌ្ឍន៍ ។ ខ្មែរ ៩០% ត្រូវការជំនឿ ដើម្បីផ្លាស់ប្តូរផ្នត់គំនិត ដើម្បីជឿនលឿនគំនិតថ្មី ប្រឈមនឹងភាពក្រីក្រ មនុស្សជាច្រើនត្រូវការរួមកម្លាំង... ចង់មិនចង់ ខ្មែរត្រូវការទាក់ទងគ្នាជាប្រព័ន្ធផ្សព្វផ្សាយមួយយ៉ាងចាំបាច់ ៕



Pring Samrang

Residents from Phnom Penh's Group 78 community gather their belongings Friday morning under the eye of police, many of whom were armed with guns and electric batons.

# Criticism Mounts in Face of Group 78 Eviction

By Simon Marks and Rann Reuy
THE CAMBODIA DAILY

Only hours after 53 families from Phnom Penh's Group 78 community accepted $8,000 in compensation, armed police took up positions early Friday morning as municipal workers in red T-shirts continued to dismantle the community's homes.

Although Friday's eviction went ahead peacefully, the reaction to the ouster of Group 78 residents coming from donor countries, human rights groups and international organizations alike has been highly critical.

"We regret that residents of Group 78 had to leave their settlement before their claims to land ownership had been adequately ownership had been adequately determined," the UN Office of the High Commissioner for Human Rights said in a statement Friday, adding that development interests in Cambodia are trumping "due process" and "land rights" in the country.

The OHCHR statement stands in stark contrast to City Hall's claims that the eviction process has been carried out under voluntary terms.

"The relocation was not voluntary, as families left under duress and were presented with no other option but to accept inadequate compensation," the statement read.

Brittis Edman, a researcher for Amnesty International in Cambodia, wrote in an e-mail Friday: "The need for an end to forced evictions is urgent, so that no more Cambodians have to go to through the traumatic experience of losing their homes."

"During the three-year long battle for Group 78, the Cambodian authorities, including the Municipality, followed none of the safeguards required under international law, and that makes what happened on Thursday and Friday a 'forced eviction,'" she added.

Mrs Edman also said that the Municipality made no attempts to properly consult with the affected community, often forbidding residents from speaking in meetings.

"This makes a mockery of the government's obligations to protect the right to housing," she said.

*Continued on page* 18



# ហោរាសាស្ត្រប្រចាំ ថ្ងៃទី ២៤ កក្កដា_០៦សីហា



### ឆ្នាំជូត : (ពពួកទេព្តាប្រុស ធាតុទឹក)

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារ អ្វីក៏ដោយ គឺតែងទទួលបាននូវផលសម្រេចជាប់ជានិច្ច ។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយមិន ថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺប្រកបតែសេចក្តីសុខ ព្រមទាំងអាចរកចំណូលចូលផ្ទះយ៉ាងគាប់ចិត្ត ទៀតផង ។ ចំពោះគូស្នេហ៍មានការយល់ចិត្តគ្នាល្អណាស់ក្នុងរយៈពេលនេះ ៕



### ឆ្នាំមមី : (ពពួកទេព្តាស្រី ធាតុភ្លើង)

រាសីលោកអ្នកល្អជាធម្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ដូច្នេះបើលោកអ្នកមានលក់ដីធ្លី ផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេងៗចូរធ្វើលិខិតស្នាមជាលាយល័ក្ខអក្សរដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឱ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខ ពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ មានភាពស្និទ្ធស្នាលដូចប្រក្រតី ៕



### ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ គឺតែងបាន ជួបនូវគូប្រជែងជើងខ្លាំងចេញមុខមកតតាំង ដូច្នេះលោកអ្នកត្រូវត្រៀមលក្ខណៈទុកសម្រាប់ទប់ទល់ជាមុន ទើបមិនជួបការបរាជ័យ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ ចូរប្រយ័ត្នប្រយែងក្រែងមាន អ្នកទីពាចូលមកជ្រៀតជ្រែក ៕



### ឆ្នាំមមែ : (ពពួកទេព្តាស្រី ធាតុមាស)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះរាល់ឧបទ្រពចង្រៃ និង រាល់ឧបសគ្គបានសាបរលាបបាត់ស្រមោលអស់រលីង ដូច្នេះលោកអ្នកអាចប្រកបកិច្ចការងារបាន ពេញដៃពេញជើង តែនៅពេលជាប់មមាញឹកខ្លាំង ចូរប្រយ័ត្នប្រយែងក្រែងមានការភ្លាំងភ្លាត់នាំឱ្យខាតបង់លាភសក្ការៈ ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខសាន្តក្សេមក្សាន្ត ៕



### ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ គឺតែងតែបានជួបនឹងគូប្រឆាំងចេញមុខមកតតាំងគ្រប់ពេលវេលា ដូច្នេះចូរ ចេះរៀបចំជើងព្រួលទុកសំរាប់ទប់ទល់ជាមុនទើបមិនលិចលង់ទាន់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ គោងប្រយ័ត្នប្រយែងក្រែងមានអ្នកទីពាចូលជ្រៀតជ្រែក ៕



### ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរប្រយ័ត្នប្រយែង ជាពិសេសមុនពេលចុះហត្ថលេខា ឬផ្តិតស្នាមមេដៃលើលិខិតស្នាមផ្សេងៗត្រូវចេះពិនិត្យពិច័យឱ្យបានល្អិតល្អន់ ទើបចៀសផុតពីការខាតបង់ប្រយោជន៍។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ធ្មត់ទើបបានសេចក្តីសុខ ៕



### ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ លោកអ្នកត្រូវចេះគ្រប់គ្រងទ្រព្យឱ្យបានគង់វង្ស ជាពិសេសអ្នករកស៊ីជួញដូរហាមបណ្តាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំ ឬក៏ឱ្យអតិថិជនជំពាក់បំណុលច្រើន ព្រោះអាចនឹងខាតបង់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិនសូវបានសុខកាយសប្បាយចិត្តទេ ព្រោះមានរឿងរកាំរកូសច្រើន ៕



### ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះជួញជិតល្អជាងជួញឆ្ងាយ ព្រោះការដើរផ្លូវឆ្ងាយបើមិនបានជួបនឹងគ្រោះអាក្រក់ទេ ក៏នឹងបាននាំរឿងក្តៅក្រហាយត្រឡប់ចូលផ្ទះវិញដែរ ។ ក្រៅពីនេះ បើមានការនិយាយស្តីអ្វីចូរប្រយ័ត្នមាត់កបន្តិច ព្រោះកាលបើមានពាក្យសម្តីនិយាយជ្រុលជ្រួសតែបន្តិចអាចបង្កទៅជារឿងបាន ។ ចំពោះគូស្នេហ៍មានការយល់ចិត្តគ្នាល្អធម្មតា ៕



### ឆ្នាំរោង : (ពពួកទេព្តាប្រុស ធាតុមាស)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរមានការប្រុងប្រយ័ត្នជាប់ជានិច្ច ជាពិសេសចំពោះអ្នកជំនួញជួញដូរមុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសារពើត្រូវចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឱ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ៕



### ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះលោកអ្នកមានអារម្មណ៍ភ្លឺថ្លា គំនិត ប្រាជ្ញាឈ្លាសវៃ ទោះប្រកបកិច្ចការងារអ្វីៗក៏ដោយ ក៏ពិភាក្សាកិច្ចការងារផ្សេងក៏ឆាប់និយាយត្រូវរ៉ូវគ្នាដែរ ទោះជា លោកអ្នកនិយាយច្រើនបន្តិចក្តី តែច្រើនបានការទាំងអស់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ បើស្រលាញ់កុំទៅញ៉ីក បើរពូកកុំទៅញួយ ទើបបានសេចក្តីសុខ ៕



### ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ ចំពោះអ្នកជំនួញជួញដូរនឹងមានទំនិញលក់ចេញទិញចូលឥតទំនេរដៃ ហើយទោះបីជាមានអតិថិជនខ្លះបំណុលខ្លះសងមិនគ្រប់ក្តី ក៏មិនភ័យព្រួយមានការបាត់បង់សូម្បីតែមួយកាក់មួយសេន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ បើស្គាល់ចិត្តស្គាល់ថ្លើមគ្នាយូរហើយ អាចគិតគូររឿងរៀបអាពាហ៍ពិពាហ៍បាន ៕



### ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះឱកាសល្អបានមកដល់ហើយ ដូច្នេះលោកអ្នកត្រូវរវៀសរវៃញាប់ជើងញាប់ដៃបន្តិច ព្រោះពេលវេលាជាមាសប្រាក់ តែកុំមានចិត្តលោភលន់ដោយចង់មានចង់បានឱ្យហួសប្រមាណពេកទេ ប្រយ័ត្នអាចបង់ខាតលាភសក្ការៈ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះកាន់តែប្រកបដោយភាពផ្អែមល្ហែមបំផុត ៕

## សោភ័ណភាព



បើទោះណាមុខជាស្នាមជ្រីវជ្រួញជារឿងធម្មជាតិក៏ពិតមែន ក៏ប៉ុន្តែបើវាកើតហើយក៏ធ្វើឲ្យយើងបាត់បង់សម្រស់មួយផ្នែកដែរ ។ តើអ្នកដឹងទេសារជាតិក្នុងបន្លែអាចជួយសម្អាតរន្ធញើសកាត់បន្ថយបញ្ហាទាំងនេះបានយ៉ាងប្រសើរបំផុតដែលយើងស្មានមិនដល់ទៀតផង ។

# វិធីបំបាត់មុន និងជ្រីវជ្រួញ ដោយបន្លែ

**• ប៉េងប៉ោះជួយព្យាបាលមុន**

អ្នកត្រូវបកសម្បកប៉េងប៉ោះរួចចិតជាបន្ទះៗ ហើយយកគ្រាប់ចេញ ។ បន្ទាប់មកយកទៅក្រឡុកឱ្យម៉ដ្តល្អ (បើគ្មានម៉ាស៊ីនក្រឡុកទេ យើងអាចប្រើវិធីមួយទៀត គឺកិនសង្កត់រហូតទាល់តែសាច់ប៉េងប៉ោះបែកឡើងប៉ផ្អេចក៏អាចប្រើបានដូចគ្នាដែរ) ។ រួចហើយលាបលើក្បាលមុន (សូមប្រយ័ត្នកុំឱ្យចូលភ្នែក) ទុកចោល១០ : ១៥នាទី រួចហើយលាងវាចេញ ដោយទឹកក្តៅឧណ្ហៗ ។ ក្នុងករណីដែលអ្នកជាមនុស្សដែលមានស្បែកឆាប់ប្រតិកម្ម ឬនៅមិនទាន់ប្រាកដក្នុងចិត្តថា តើអាចមានប្រតិកម្ម ឬអត់នោះ អ្នកអាចសាកល្បងអនុវត្តនៅលើខ្នងដៃសិនក៏បាន ។ ប្រសិនបើមានអាការៈផ្សាខុសប្រក្រតី សូមប្រញាប់លាងចេញភ្លាម ហើយមិនគួរប្រើលើផ្ទៃមុខឡើយ ។

**• ត្រកួនជួយបំបាត់ស្នាមជ្រីវជ្រួញ :** ចូរត្រៀមត្រកួន២ដើម ពងមាន់ផ្នែកសមួយគ្រាប់ រួចយកត្រកួនមកកាត់ឫសចោល ហើយលាងទឹកឱ្យស្អាតចិញ្ច្រាំ ឬហាន់ឱ្យជិតម៉ដ្ឋ គោះពងមាន់ដាក់ពែង ដោយយកតែផ្នែកសមកប្រើ រួចយកទៅកិនក្រឡុកឱ្យម៉ត់ ។ បន្ទាប់មកលាងសម្អាតមុខឱ្យស្អាត ទើបលាបក្រែមថែរក្សាស្បែកដែលទើបនឹងធ្វើហើយ ដោយលាបរហូតដល់សព្វលើផ្ទៃមុខ រួចទុកចោលប្រមាណ៥ទៅ១០នាទី ទើបលាងចេញដោយទឹកស្អាត ។ ប្រសិនបើប្រើក្រែមត្រកួននេះជាប្រចាំ វានឹងជួយលុបបំបាត់ស្នាមជ្រីវជ្រួញ នឹងអាចជួយព្យាបាលស្បែកឱ្យមើលទៅភ្លឺរលោងស្រស់ថ្លាបាន ទៀតផង ៕

(តមកពីទំព័រទី ០៤) ## លោកនាយករដ្ឋមន្ត្រី ហ៊ុនសែន...

លោកប្រធានាធិបតី " សាកូស៊ី " ដែលយកវេទិកាប្រជាជាតិ ធ្លាប់មានប្រវត្តិតស៊ូយ៉ាងស្វិតស្វាញ ដំណើ្តមយកលទ្ធិប្រជាធិតេយ្យមកធ្វើនយោបាយ បង្ហាញមុខមាត់លោកនាយករដ្ឋមន្ត្រីខ្មែរ ជាកិត្តិយសសំរាប់ប្រជាជាតិបារាំង ។ ប្រទេស យូរ៉ុប ជាច្រើនរួមទាំងអាមេរិកខាងជើង និង អូស្ត្រាលី រួមទាំងសហគមន៍ខ្មែរ បានវាយតម្លៃក្នុងវេបសាយ ឬសេចក្តីថ្លែងការណ៍នានាថា នាយករដ្ឋមន្ត្រី ហ៊ុន សែន នេះពុំមានប្រវត្តិតស៊ូក្នុងការលើកតម្កើងលទ្ធិប្រជាធិបតេយ្យ នៅក្នុងប្រទេសកម្ពុជានោះទេ ។

តាមពិតលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន មានវត្តមាននៅវេទិការបស់ភ្ញៀវនៃប្រទេសបារាំង ដែលបានមកធ្វើទស្សនកិច្ចចំថ្ងៃបុណ្យជាតិតែប៉ុណ្ណោះ ។ ទូរទស្សន៍ធំៗបារាំង ពុំបានផ្សព្វផ្សាយផ្តោតក្នុងរូបភាពរបស់ខ្លួន ពីវត្តមានលោក ហ៊ុន សែន នៅក្នុងឱកាសដង្ហែរក្បួនព្យុហយាត្រានៃកងទ័ពបារាំងនោះទេ ។ រីឯការសែតឡឺម៉ុង ឬ ហ្វីគ្វារ៉ូ ឬ ឡឺបារីសីយាង ក៏ពុំបានយកទំព័រខ្លួនសរសេរពីលោក ហ៊ុន សែន ដែរ ។

លោកនាយករដ្ឋមន្ត្រី ប្រាក់ សុខុន នៅពេលអមដំណើរលោក លោក ហ៊ុន សែន មកដល់ភ្នំពេញ ថ្ងៃទី ១៩ បានប្រកាសពីជោគជ័យនៃទស្សនកិច្ចរបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន នៅប្រទេសបារាំង ថាបានជួបនឹងលោក "សាកូស៊ី" ជាប្រធានាធិបតី ជាពិសេស ជួបលោក " ប៊ែណាគូស្នែ " ជារដ្ឋមន្ត្រីការបរទេសបារាំង ។ លោកបន្តថា : លោក ហ៊ុន សែន បានផ្តល់ សម្បទានប្លុកទី៣ នៃដែនសមុទ្រកម្ពុជា ឱ្យទៅក្រុមហ៊ុន "តូតាល់ " វិនិយោគ ដោយមិនបាច់ដេញថ្លៃ ។ ក្រៅពីនោះ មានការស្នើឱ្យ លោក ហ៊ុន សែន សុំឱ្យបារាំងបន្តគាំត្រការផ្តល់ហិរញ្ញប្បទានដល់កម្ពុជា ជាពិសេស សុំអញ្ជើញមន្ត្រីថ្នាក់ដឹកនាំជាន់ខ្ពស់ឱ្យទៅធ្វើទស្សនកិច្ចនៅកម្ពុជាវិញម្តង ៕

## Group 78...

CONTINUED FROM PAGE 16

On Thursday, the World Bank issued a statement cosigned by the European Commission, the Asian Development Bank, the UN and the embassies of Australia, the US, UK, Denmark, Bulgaria and Germany calling on the government to stop forced evictions until a transparent mechanism for solving land disputes is put in place.

The statement said that "urban dwellers are under threat of being moved to make way for high value property development," putting at risk the livelihoods of thousands of poor people living in disputed urban areas.

Officials at the US, Australian, Danish and Swedish Embassies said Friday that they had nothing more to add to the statement and officials at the UK and German Embassy could not be reached for comment.

CPP lawmaker Cheam Yeap expressed gratitude for the concerns coming from the international community, but said such evictions are necessary for development.

"The eviction is the effect from development and is not the government's intention," he said. "Before the government decided to do this, it considered it very seriously."

He added that in the long term the eviction of Group 78 would benefit the Cambodian people as a whole, leading to a better environment and higher levels of sanitation.

Phnom Penh Deputy Governor Mann Chhoeun said he thought that those who had been evicted were happy with the way things turned out and praised them for their peaceful attitude during the eviction.

"The solution of City Hall brought great care to the people. While the economic crisis is still in place, those people still received money," he said, adding that the dismantling of their homes was done carefully and "with love."

Mr Chhoeun said that the heightened levels of criticism coming from NGOs and development partners are "completely biased."

"They do not really love Khmers like Khmer people do," he said.

But in a joint statement released Friday by local NGOs the Housing Rights Task Force, Community Legal Education Center, Licadho, the Cambodian Center for Human Rights, and the Center on Housing Rights and Evictions, Licadho Director Naly Pilorge said that Friday's eviction was "yet another black day for land rights in Cambodia."

"Once more, some of Phnom Penh's poorest and most vulnerable residents have been forced off their land in return for grossly inadequate compensation," she said.

And for Chan Vichet, a former resident of Phnom Penh's evicted Dey Krahorm community, who saw his house destroyed in January and was present at the Group 78 eviction, "love" is not a word he chose to describe Friday's events.

Pring Samrang

An emotional resident of Group 78 dries her eyes with her krama as municipal workers dismantle her and her neighbors' homes Friday.

"Whenever I see people crying after losing their home, I have a lump in my throat," he said as broken pieces of iron and wood were loaded up into trucks nearby.

"I loved my house. I had lived in it for ten years and it was made of good quality wood," said Bun Kich, 60, a former resident of the Group 78 community whose house was flattened Friday morning with sledgehammers.

According to local rights organizations, six of the seven remaining families who had not agreed to Phnom Penh City Hall's original offer had received $20,000 in compensation Friday morning, while one family who refused to accept the compensation had their home destroyed by the authorities anyway.

*(Additional reporting by Phann Ana)*

Marks, Simon & Reuy, Rann. Criticism Mounts in Face of Group 78 Eviction. The Cambodia Daily Saturday-Sunday, July 18-19, 2009. Phnom Penh, Cambodia. The Khmer Post, LLC obtained full rights from the Publisher of the Cambodia Daily to reprint this article.

(តមកពីទំព័រទី ០១) **បុណ្យចូលវស្សាព្រះសង្ឃត្រូវគង់ក្នុងវត្ត...**

ព្រះពុទ្ធសាសនា ទៀតផង ។

បុណ្យចូលវស្សា គឺជាបុណ្យមួយមានកំណើតតាំងពីយូរលង់ណាស់មកហើយ ដែលពុទ្ធបញ្ញត្តិឱ្យភិក្ខុ សាមណេរទាំងអស់ត្រូវតែចូលវស្សាក្នុងរយៈពេល3ខែ បើរក្សាមិនបានទេនឹងត្រូវមានទុក្ខទោសទណ្ឌកម្មជាក់ជាមិនខានឡើយ ។ ព្រះសង្ឃត្រូវតែប្រុងប្រយ័ត្នស្មារតីសតិអារម្មណ៍ឱ្យល្អសាទរចំពោះបុណ្យនេះ គឺត្រូវដុះសំអាតរៀបចំអាសនៈព្រះពុទ្ធរូប បោកគក់ស្បង់ស្បៃត្រៃចីវរឱ្យបានស្អាត មិនត្រូវនិមន្តទៅទីឆ្ងាយ ។ ជាពិសេសព្រះសង្ឃនៅតាមទីអារាមនានាត្រូវតែខិតខំរៀនសូត្រឱ្យបានមាំមួន សូត្រធម៌ឱ្យបានទៀងទាត់ ទាំងព្រឹក និងល្ងាចនៅក្នុងព្រះវិហារ ។ ចំណែកពុទ្ធបរិស័ទជិតឆ្ងាយក៏ត្រូវតែរៀបចំពិធីចូលវស្សាជាមួយព្រះសង្ឃដែរ ដោយបានរៀបចំទេយ្យទាន សាដក ប្រេងកាត ទៀន ធូប ផ្កាភ្ញី និងគ្រឿងឧបភោគប្រគេនដល់ព្រះសង្ឃទៅតាមលទ្ធភាពដែលខ្លួនមាននៅតាមទីអារាមនានាដែរ ។





បញ្ហាបុណ្យចូលវស្សានេះក្នុងវិន័យបិដកមហាវគ្គ ភាគទី7បញ្ជាក់ថា បុណ្យចូលវស្សាមាន2យ៉ាង គឺទី1 ហៅថា បុរិមិកាវស្សា ការចូលវស្សាមុនដំបូងចាប់ពីថ្ងៃទី1រោជ ខែអាសាឍ (បើឆ្នាំណាលើកខែអាសាឍ2ដងនោះចូលវស្សានេះនៅថ្ងៃទី1រោជ ខែទុតិយា សាឍ តទៅអស់មួយត្រីមាស (រយៈពេល3 ខែ) ទើបចេញវស្សានៅថ្ងៃ15រោច ខែអស្សុជ និងទី2ហៅថា បច្ឆិមិកាវស្សាការចូលវស្សាលើកក្រោយ (ក្រោយថ្ងៃចូលវស្សាលើកដំបូង1ខែ) គឺចាប់ពីថ្ងៃ1រោច ខែស្រាពណ៍ រហូតដល់ថ្ងៃ15កើត ខែកត្តិកទើបចេញវស្សា ។

ការចូល វស្សាលើកក្រោយនេះព្រះពុទ្ធទ្រង់អនុញ្ញាតដល់សាវកក្រែងមានកិច្ចរវល់ប្រការណាមួយពុំអាចចូលវស្សា លើកទី1ក៏ឱ្យចូលវស្សាលើកទី2បានដូចគ្នាដែរ ។ ប៉ុន្តែបើតាមលំអានទំនៀមទម្លាប់ខ្មែរបុរាណដែលរៀបរៀងដោយលោក ញាណ ភឿន និង លោក ម៉ម នៃ បញ្ជាក់ថា ថ្ងៃ1រោជ ខែអាសាឍ ជាទិវាត្រូវចូលវស្សារបស់បុព្វជិត ពុទ្ធសាសនាទាំងភិក្ខុ សាមណេរជាការចាំបាច់តាមពុទ្ធានុញ្ញាត ។

រីឯទាយក ទាយិកា ឧបាសក-ឧបាសិកា ជាពុទ្ធសាសនិកចំណុះជើងវត្តនីមួយៗក្រោមការដឹកនាំរបស់លោកអាចារ្យក៏ប្រារព្ធធ្វើបុណ្យចូលវស្សា ឬបុណ្យកាន់វស្សាផងដែរ តែធ្វើនៅថ្ងៃ15កើត ខែអាសាឍមុនព្រះសង្ឃចូលព្រះវស្សា1ថ្ងៃ ។ បានសេចក្តីថា កន្លះខែមុនចូលវស្សា ឬថារាល់ថ្ងៃឧបោសថសីល (ថ្ងៃខែដាច់ ខែជេស្ឋ ឬថ្ងៃ8កើត ខែអាសាឍ) លោកអាចារ្យវត្តតែងប្រកូកប្រកាសជម្រាបពុទ្ធបរិស័ទឱ្យដឹងជាមុនអំពីថ្ងៃចូលវស្សាខាងមុខ (ប្រជុំពិភាក្សាឯកភាពក្នុងជួរអាចារ្យគណៈកម្មការវត្តចាស់ព្រឹទ្ធាចារ្យរួចហើយ)ឱ្យពុទ្ធបរិស័ទ តទៅទំព័រទី ២០

(តមកពីទំព័រទី ១៩) **បុណ្យចូលវស្សាព្រះសង្ឃត្រូវគង់ក្នុងវត្ត...**

ត្រៀមលក្ខណៈប្រុងប្រៀបរៀបចំចតុប្បច្ច័យទេយ្យវត្ថុ មានសាដក ទៀនធូបប្រេង ចំណាំវស្សាសម្រាប់ទំនុកបម្រុងព្រះសង្ឃដែលគង់ចាំវស្សាក្នុងវត្ត និងជម្រាបបរិស័ទមកជួបជុំគ្នានៅថ្ងៃ15កើត ខែអាសាឍ ដោយនាំមកនូវទេយ្យវត្ថុផង ។

អាចារ្យវត្ត កន្លែងខ្លះមានឱ្យលិខិតដែលកំណត់ទេយ្យវត្ថុអ្វីខ្លះក្នុងមួយកញ្ចប់ និងប្រាក់សង្កត់លើទេយ្យវត្ថុនោះប៉ុណ្ណោះ ជូនដល់លោកអ្នកមានសទ្ធាជ្រះថ្លាតាមគ្រួសារនីមួយៗ ។ មិនតែប៉ុណ្ណោះលោកអាចារ្យគណៈកម្មការវត្តចាត់ចែងស្វែងរកទៀនធំៗ ហៅថា ទៀនចំណាំវស្សាទៀនធំមួយគូនេះសម្រាប់ដុតចាប់ផ្តើមពីថ្ងៃរោជ ខែអាសាឍ ក្រោយពីសមាទានឧបោសថសីល រួចហើយលោកអាចារ្យប្រកាសឱ្យពុទ្ធបរិស័ទយករណ្តាប់រៀងៗខ្លួនចូលបុណ្យដែលត្រូវជួបជុំគ្នានៅម៉ោង2រសៀលដើម្បីធ្វើពិធីសូត្រមន្តចូលវស្សា ។

នៅពេលរសៀលពុទ្ធបរិស័ទ មកជួបជុំគ្នារួមទាំងកញ្ចប់ទេយ្យវត្ថុផង ក៏ធ្វើពិធីហែសាដកចំណាំវស្សានេះពីឧបដ្ឋានសាលាទៅកាន់ក្នុងព្រះវិហារ ដោយនិមន្តព្រះសង្ឃគ្រប់អង្គក្នុងវត្តទៅតែម្តង ។ ពិធីចាប់ផ្តើមនមស្សការព្រះរតនត្រ័យ សមាទានសីល ហើយអារាធនាព្រះសង្ឃចម្រើនព្រះបរិត្ត ។ លុះចប់ពុទ្ធមន្តហើយលោកអាចារ្យប្រកូកប្រកាសអំពីថ្ងៃចូលវស្សា ។

លោកព្រឹទ្ធាចារ្យ មៀច ប៉ុណ្ណ ទីប្រឹក្សាវិទ្យាស្ថានពុទ្ធសាសនបណ្ឌិត្យ បានឱ្យដឹងថា ការដង្ហែទៀនវស្សានេះនៅប្រទេសឥណ្ឌា និងប្រទេសស្រីលង្កាបានប្រារព្ធធ្វើតាំងពីយូរលង់ណាស់មកហើយ ។ចំណែកនៅប្រទេសយើងទើបតែប្រារព្ធធ្វើនៅក្នុងរជ្ជកាលព្រះបាទអង្គឌួងសម័យឧដុង្គ ។ នៅសម័យព្រះអង្គឌួងគេច្រើនធ្វើនៅតាមវត្តអារាមធម្មយុត្តិប៉ុណ្ណោះ លុះចំណេរកាលក្រោយមកក៏បានរីករាលដាលដល់វត្តគណៈមហានិកាយពាសពេញផ្ទៃប្រទេស ។

លោកព្រឹទ្ធាចារ្យបន្តថា ក្នុងពិធីនោះពុទ្ធបរិស័ទជិតឆ្ងាយបានយកនូវទេយ្យវត្ថុបច្ច័យមកប្រគេនចំពោះព្រះសង្ឃ ជាពិសេសប្រេងកាតទៀន សម្រាប់អុជបំភ្លឺក្នុងវត្តទូទាំងប្រទេស ដែលគេមានជំនឿថា វត្ថុទាំងនេះនឹងជួយពួកគេមានប្រាជ្ញាភ្លឺស្វាង រៀនសូត្រចេះចាំបានខ្ពង់ខ្ពស់ដោយប្រាថ្នាឱ្យជាតិក្រោយ មានចំណេះវិជ្ជាភ្លឺថ្លារុងរឿងដូចរស្មីភ្លើងទៀន ។ ពន្លឺភ្លើងទៀននេះ ត្រូវបានគេតំណាងឱ្យពន្លឺ បញ្ញា វិជ្ជា និងសុខសន្តិភាពសេរីភាពទៀតផង ។

បុណ្យចូលវស្សាមានសារសំខាន់ណាស់សម្រាប់ភិក្ខុសាមណេរទាំងអស់ត្រូវតែប្រណិបតន៍តាមពុទ្ធានុញ្ញត្តិ បើពុំនោះទេនឹងត្រូវមានទោស គឺព្រះសង្ឃត្រូវគង់នៅក្នុងវត្តខិតខំរៀនសូត្រធម៌ ធ្វើសមាធិ និងត្រូវចូលទៅសូត្រធម៌ ក្នុងព្រះវិហារទាំងពេលព្រឹក និងល្ងាចកុំបីខានឡើយ ។

ចំណែកពុទ្ធសាសនិកជិតឆ្ងាយក៏មានភារកិច្ចរៀបចំប្រារព្ធពិធី បុណ្យដោយលះបង់នូវទ្រព្យសម្បត្តិផ្ទាល់ខ្លួន ប្រគេននូវទេយ្យវត្ថុទានដល់ព្រះសង្ឃមានប្រេងកាត ទៀន ធូប ផ្កាភ្ញី គ្រឿងឧបភោគបរិភោគដល់ព្រះសង្ឃ ។ ដើម្បីទទួលបាននូវអានិសង្សជម្រះនូវបាបកម្មទុក្ខទោសផ្សេងៗប្រាថ្នាឱ្យបានសុខសប្បាយនៅបច្ចុប្បន្នជាតិ និងអនាគតជាតិទៅ កើតនៅទីបរមសុខគឺឋាន សួគ៌ និព្វាន ។

ធូក ទៀន និងប្រេងកាត ដែលពុទ្ធបរិស័ទនិយម បូជានៅក្នុងពិធីបុណ្យ ចូលវស្សានេះ គេមានជំនឿថា នឹងមានកុសលនៅជាតិនេះ ឬជាតិខាងមុខមានបញ្ញាស្មារតីភ្លឺថ្លា រៀនឆាប់ចេះ និងជាកំណប់ទ្រព្យដ៏ប្រសើរបំផុត ៕

**កំណត់និពន្ធបន្ថែម :**

រូបថតដែលយើងបង្ហាញជូនជាមួយអត្ថបទនេះ គឺថតនាឱកាសចូលវស្សា នៅវត្តព្រះពុទ្ធរង្សី ។ ព្រះសង្ឃវត្តនេះ ពុំបានរង់ចាំឧបាសកឧបាសិកាមកធ្វើការបំរើព្រះអង្គគ្រប់ពេលនោះទេ លោកអាចធ្វើការក្រៅពីកិច្ចការព្រះពុទ្ធសាសនាបានប្រសើរដូចគ្រហស្ថឯទៀតដែរ ។ គំរូនោះ គេឮថា មានតែពីដើមសម័យមុនតែប៉ុណ្ណោះ -តែនៅវត្តព្រះពុទ្ធរង្សីកំពុងតែបង្ហាញគំរូថា ពាក្យនេះមិនពិតទេ ព្រះសង្ឃដែលឧស្សាហ៍ថែទាំវត្តអារាម ឧស្សាហ៍ធ្វើការបំរើព្រះធម៌ដោយគ្មានខ្ជិលច្រអូស គ្មានប្រឆាំងនឹងព្រះធម៌នោះទេ ៕